ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខែ ៦




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណឺម៉ង្ត

គ្រិ. ឆ្នាំ ១៩២៧

ព. ស. ២៤៧០

អ្នកទទួលខុសត្រូវ ជុំ-ម៉ៅ

# បញ្ជីរឿង

ទំព័រ


១- អំពីចេតិយបុរាណក្នុងស្រុកលង្កា លោកហុការត៍ចាងហ្វាងក្រសួងរ៉ែរក្សាច់រចនាបុរាណក្នុងស្រុកលង្ការៀបរៀង ក្រុមការ ជុំ-ម៉ៅ ធ្វើរាជការនៅព្រះរាជបណ្ណាល័យកម្ពុជាប្រែជាភាសាខ្មែរ . . . . . ៤៤៨

២- មរណានុស្សតិកម្មដ្ឋានពិស្តារ ព្រះគ្រូវិមលបញ្ញា អ៊ុម ស៊ូរ អាចារ្យក្នុងព្រះរាជបណ្ណាល័យកម្ពុជា ប្រែចេញពីបាលីវិសុទ្ធិមគ្គ . . . ៤៥៥

៣- អំពីដើមកំណើតប្រាសាទអង្គរ (តរគ្គាពីខ្សែទី ៤ ) លោកល្វីហ្វីណូត៍ អាចារ្យបង្រៀនឧត្តមវិជ្ជា សាលាកូឡេសដឺហ្វ្រង្សនៅក្រុងប៉ារីស ជាអ្នកអធិប្បាយក្រុមការ ជុំ ម៉ៅ ធ្វើរាជការនៅព្រះរាជបណ្ណាល័យកម្ពុជា ប្រែចេញជាភាសាខ្មែរ . . . . . . . . . . ៤៨២

៤- គតិលោក ឬ ច្បាប់ទូន្មានខ្លួន ឧកញ៉ាសុត្តន្តប្រីជា ឥន្ទ រៀបរៀង . .
(អត្ថបទនេះមិនបានចុះផ្សាយទេ ព្រោះមានបោះចេញជាសៀវភៅហើយ)

# សេចក្ដីអធិប្បាយអំពីចេតិយបុរាណ

## ក្នុងស្រុកលង្កា (សីឡុង)

## លោក ហុការត៍

ចាងហ្វាងក្រសួងរិះរកក្បាច់ចនាបុរាណ ក្នុងស្រុកលង្កា រៀបរៀង

## ក្រុមការ ជុំ-ម៉ៅ

ធ្វើរាជការនៅព្រះរាជបណ្ណាល័យប្រែជាភាសាខ្មែរ

---

## សេចក្ដីពន្យល់ របស់ ម៉ាដឺមូអាហ្សែល ការប៉ីឡែស

## អំពីរូបផ្ដិតពុម្ពខ្លះដែលមានក្នុងសេចក្ដីអធិប្បាយនៃលោក ហុការត៍

យើងបានដឹងតាមដែលមានសម្ដែងក្នុងគម្ពីរមហាវង្ស ថាក្រុងបោលោន្នារុវ និងអនុរាធបុរ ជាក្រុងដែលមានកេរ្តិ៍ឈ្មោះក្នុងកោះលង្កា ក្នុងព្រះពុទ្ធសករាជ ១៣៨៩ មកដល់ ១៨៣១ ដូចយ៉ាងទីក្រុងអង្គរ ល្បីនាមឮឡើងក្នុងនគរខ្មែរ កាលក្នុងពុទ្ធសករាជ ១៣៤៥ ដល់ ១៨៤០ ដូច្នេះដែរ ។

គំនូរទី ១ (ឯ.ស. ៣៤៨) ជាគំណាងចេតិយ ១ នៅក្នុងក្រុងបោលោន្នារុវ សាងក្នុងរវាងពុទ្ធសករាជ ១៦០៨ ។

គំនូរទី ២ (ឯ.ស. ៣២៧) ជាគំណាងចេតិយ ១ នៅមិហិន្តល សាងក្នុងរវាងពុទ្ធសករាជ ១៤៥០ មិហិន្តលជាភ្នំមួយ កម្ពស់ជាង ៣០០

ម៉ែត្រ ហើយឆ្ងាយពីក្រុងអនុរាធបុរ ចំនួនប្រហែលជា ១៤ គីឡូម៉ែត្រ នៅលើភ្នំនោះ ហើយដែលព្រះមហិន្ទត្ថេរ ជាបុត្រព្រះបាទអសោកកាជ នាំព្រះពុទ្ធសាសនាពីស្រុកឥណ្ឌាទៅផ្សាយដល់អ្នកស្រុកលង្កា ក្នុងពុទ្ធសកកាជ ១១៨៣ ។

កំនូរទី ៣ (ឯ.ស ៣២៦) គឺសត្តមហល់ប្រាសាទ នៅក្នុងដំបន់ប៉ោឡោន្នរុវ៉ាសាងពីឥដ្ឋទាំងអស់ ចេតិយនេះ មានសណ្ឋានបែបផែនប្រហែលគ្នា នឹងប្រាសាទសំបូរព្រៃគុក នៅចម្ងាយ ២៨ គីឡូម៉ែត្រពីកំពង់ធំ ដលសាងក្នុងរវាង ពុទ្ធសកកាជ ១១៤៣ ។

កំនូរទី ៤ (ឯ.ស. ៣២៤) គឺកន្ទ្វង់ប្រាសាទបុរាណដែលបាក់បែកអស់ នៅក្នុងក្រុងអនុរាធបុរ ។

កំនូរទី ៥ (ឯ.ស. ៣២០) គឺគល់វិហារ នៅក្នុងដំបន់ប៉ោឡោន្នរុវ៉ វិហារនេះធើតដោយបដិមាករ និងទីសន្និបាតដែលលកឆ្លាក់ធ្វើឡើងដោយផែនថ្មតែ ១ ដុំ នៅខាងឆ្វេងមានព្រះពុទ្ធរូបផ្ចាញ់មារ ហើយតទៅទៀតមានទីសន្និបាត និងសសរ ២ ហើយមានព្រះពុទ្ធរូប ១ អង្គលកឆ្លាក់ក្នុងផែនថ្ម ១ នៅខាងឆ្វេងទីសន្និបាតនោះ ឃើញមានរូបព្រះមហាអានន្ទឈរ ហើយឆ្ងាយពីនោះបន្តិច មានព្រះពុទ្ធរូបបរិនិព្វាន វិហារនេះតាំងនៅជាកណ្ដាលច្រូងព្រៃ ។

កំនូរទី ៦ (ឯ.ស.៣១៩) គឺប្រាសាទអវេក្កល នៅប្រាសាទនេះ

ឃើញមានសំណាមប្រហោង ដែលគេចោះច្រើនកន្លែង នៅលើជញ្ជាំង មានសណ្ឋានដូចគ្នា នឹងប្រាសាទនៅអង្គរដែរ ឯប្រហោងទាំងនេះ គេរកដើមឫសមិនទាន់ឃើញនៅឡើយ ។

គំនូរទី ៧ (ឯ.ស.៣១៧) គឺស្រះគិរិត័ល ។ ជាការមានប្រយោជន៍ត្រូវតែសម្គាល់ថា ទីក្រុងចាស់របស់ស្រុកលង្កា មានស្រះធំៗ ដូចយ៉ាងទីក្រុងចាស់ខ្មែរ ដែលមានបាពយណ៍នោះដែរ ។

ស ការប៉ុឡែស

# អំពីបែបភាពនៃប្រាសាទផ្សេងៗក្នុងស្រុកលង្កា

នៅក្នុងស្រុកលង្កា ក៏ដូចជាក្នុងស្រុកឯទៀតដែរ អស់ទាំងប្រាសាទដែលគេសាងឧទ្ទិសដល់ពុទ្ធសាសនានោះ ចែកចេញបានជា ២ បែប គឺ បែបគាន់និង បែបប្រហោង ។

ឯបែបគាន់ដែលគេសាងក្នុងស្រុកលង្កានោះ គឺជាព្រះស្តូប ឬចេតិយនោះឯង ឯរឿងរ៉ាវនៃចេតិយក្នុងស្រុកលង្កានោះ មិនជាមានប្រយោជន៍ប៉ុន្មានទេឡើយ ដោយហេតុថាក្នុងស្រុកនោះ តាំងពីច្រើនរយឆ្នាំហើយ គេកម្រនឹងផ្លាស់បែបដែលកសាងនេះណាស់ (មើលគំនូរលេខ ១ ឯ.ស. ៣២៨) សេចក្ដីដែលមិនប្រែប្រួលផ្លាស់បែបនេះធ្វើឲ្យឃើញថា ស្រុកលង្កាកាន់យកទំនៀមទម្លាប់ ពីបុរាណឥតប្រែប្រួលឡើយ ។

ហាក់ដូចជាក្នុងរវាងឆ្នាំ ៩០០ ដែលគេបានកសាងចេតិយ មានដំបូលចុល់បន្ថុបឡើង បានជាថាដូច្នេះ ព្រោះមិនទាន់ច្បាស់សកកដនៅឡើយ ដែលកសាងនេះប្រហែលជាពួកមហាយានទេ គេបានកសាងប៉ុន្តែគ្មានអ្វីបញ្ជាក់ឲ្យពិតសោះ (មើលគំនូរលេខ ៣ ឯ.ស.៣២៧) លុះដល់មកក្នុងឆ្នាំ ១២០០ ទើបឃើញមានបែបគាន់កង្កូនជ្រុងខ្ទះកើតឡើង ឥតមានអ្នកណាដឹងរឿងអ្វីឲ្យជាក់ប្រាកដ អំពីបែបផែនចេតិយនេះឡើយ ប៉ុន្តែបែបចេតិយនេះ ប្រាកដជាមកពីប្រទេសក្រៅឯទៀត ហើយឯចេតិយសត្តាហ័ល នៅស្រុកបោលោន្នរុវនោះ កាលដើមមានកង់ខាងក្រោមបួន

ជ្រុង ហើយខាងលើ ៦ ជ្រុង ហើយគេកែប្រែពីបែបដើមមកតាំងមូលដូចមានគំនូរទី ៤ (ឯ ស.៣២៦ ) ធ្វើឲ្យឃើញថាគេកែមកដូចម្ដេចស្រាប់ ៗ

រឿងរ៉ាវនៃចេតិយដែលប្រហោងនោះ មានប្រយោជន៍ជាង ព្រោះបែបចេតិយតាំងនោះធ្វើប្លែក ៗ ឡើង តាមកាលតាមសម័យ ឯបែបដែលគេសាងដំបូងនោះ មិនប្រាកដជាកើតក្នុងពេលណាឡើយ ប៉ុន្តែប្រហែលជាមិនមែនកើតមុនគ្រិស្តសករាជ ២០០ ឆ្នាំទេ ចេតិយតាំងនេះ ខាងជើងក្រោមគឺ គេលើកដីខ្ពស់ឡើងកង ៤ ជ្រុង ហើយរៀបថ្មនៅខឿនជុំវិញតែប៉ុណ្ណោះ ឥតមានរចនាអ្វីទៀតឡើយ ហើយនៅកន្លែងនោះ គេសាងជាតួចេតិយឡើង គឺសាងដោយយកដីមកបូកបង្ហាប់ ឬដោយយកឈើមកធ្វើ ដូចជាគេបានប្រទះឃើញ ជាច្រើននៅដល់សព្វថ្ងៃនេះ ៗ តើបែបនេះឯង ជាបែបថ្មីដែលផ្សាយមកពីស្រុកឥណ្ឌា ក្នុងរវាងឆ្នាំ ១០០ ដល់ឆ្នាំ ១០០០ ឬអ្វី ឬមួយក៏ចេតិយធ្វើដោយដីបូកនេះ កាលជាន់ដើមគេសាងភ្ជាប់នឹងដីតែម្ដង ឥតមានខឿនកល់ទេ ឬអ្វី ៗ

ឯខឿននេះ តាមធម្មតា ច្រើនតែមាន ២ គឺខឿនទី ១ តែងតែនៅពីខាងកើត គឺជាមណ្ឌប ឯខឿនទី ២ គឺតួអាសនៈនោះឯង ៗ

លុះពេលក្រោយមកទៀត គេយកថ្មដែលគេតំលើង មករចនាឡើង គេគ្រាន់តែយកថ្មមកតម្រៀបបន្តុបៗ ឥតមានបែបផែនអ្វីឡើយ ហើយចេតិយក៏គ្រាន់តែតូចទាបចុះ ប៉ុន្តែថ្មដែលគេប្រើការនោះ ធំៗណាស់ ឯថ្នាក់ខាងក្រោមនោះធ្វើឲ្យខ្ពស់ឡើង ហើយដើម្បីនឹងឆ្លងពីមណ្ឌបទៅឯទី

អាសនៈនោះ លុះតែមានស្ពាន ១ ទើបចូលទៅបាន ។

កន្លងពីនោះយូរមក គេធ្វើចេតិយកាន់តែធំៗឡើង ហើយរចនាតុបតែង ឲ្យល្អជាងដើមបន្តិចៗឡើង គេបានធ្វើពុម្ពបែបធម្មតាខ្លះ (មើលគំនូរលេខ ង.ស. ៣២៤) តមកទៀតការតុបតែងកាន់តែចម្រើនល្អឡើងក្បាច់ចម្លាក់អ្នកស្រុកលង្កាក៏កាន់តែកើតឡើងទៀត ដែលគេច្រើនរចនាតុបតែងជាងគេនោះគឺចេតិយ ដែលមានរូបរាងដូចជាចំហៀងព្រះចន្ទ្រ ដែលថតជាប់មកនេះ គឺជាចេតិយដែលល្អជាងគេនោះឯង ក្នុងកាលជាន់នោះពងប្រាសាទដែលមានដំបូលតាលកបស្មើ ក៏បាត់អស់ទៅ មុខគួរឲ្យមានសេចក្តីឆ្ងល់ ។

លុះមកដល់រវាងឆ្នាំ ១២០០ បែបវិហារស្ថានខាងលើនេះក៏គេបោះបង់ចោលទៅទៀត ទៅបានបែបពងទ្រវែងធ្វើពីឥដ្ឋមកវិញ ទំនងជាធ្វើតាមលំអានសាសនាហិណ្ឌូ វិហារស្ថានទាំងនេះមានដើមឫសជាមួយគ្នានឹងវិហារស្ថាន ៤ ជ្រុងនោះដែរ បានជាថាដូចនេះព្រោះគេបានស្គាល់ហាត់ជាដើមដូចគ្នា ប៉ុន្តែមកធ្វើភាពសណ្ឋានឲ្យផ្សេងគ្នាទៅ ឯបែបទី ១ នោះមិនទាន់បាត់នៅឡើយទេ តែច្រើនឃើញមានតែក្នុងស្រុកស្រែ ជាងស្រុកក្រុង ព្រោះគេមិនសូវកប់គាន ដោយហេតុនេះបានជាឃើញមានជាច្រើននៅក្នុងស្រុកកន្ទី គេបានទាំងឃើញបែបវិហារស្ថាន ២ ដែរ មានដំបូលតាប ២ ជាន់ផង ហើយប្រហែលជានៅមានទៀត ដែលមិនទាន់បានឃើញ ប៉ុន្តែក្នុងសម័យឥឡូវស្ទើរតែគ្រប់ចេតិយទាំងអស់ គេសាងមិនឲ្យមាន

មណ្ឌបឡើយ ឯចេតិយនៅស្រុកកន្ទីនោះ ដំបូលកបតាំង ២ ជាប់គ្នាទៅវិញ ៗ

នៅមានបែបចេតិយម៉្យាងទៀតដែលហៅថាគុក (មើលគំនូរលេខ ឯ.ស ៣២០) ឯចេតិយគុកនេះមិនសូវមានធ្វើស្តូបតាំងមូលឡើយ ច្រើនតែសាងលើទីដែលមានភាពសណ្ឋាន ទំនងជាចេតិយស្រាប់ ឧបមាដូចជាមានថ្មខូងទៅ ហើយគេទៅធ្វើជាផ្ទាំងភ្ជាប់ដោយដីឥដ្ឋ ឬ ដោយឥដ្ឋ ព្រោះក្នុងជាន់ដើម គេកម្រធ្វើដោយថ្មណាស់ គ្រាន់តែធ្វើប៉ុណ្ណោះ ក៏កើតជាតួវិហារឡើង (មើលគំនូរលេខ ៦ ឯ.ស. ៣១៩) ៗ

ឯចំណែកគេហស្ថានវិញនោះ មិនឃើញមានបែបសណ្ឋានអ្វីជាស្តុកស្តម្ភឡើយ ឃើញមានតែស្តេចបាក្រមពាហុទី ១ ក្នុងឆ្នាំ ១២០០ ប៉ុណ្ណោះ ដែលបានសាងប្រាសាទសម្រាប់គង់យ៉ាងល្អ ដូចជាព្រះវិហារ ឯការជាធំដែលគួរសម្គាល់នៅក្នុងស្រុកលង្កានោះ គឺការជីកទំនប់ទឹកនោះឯង ប៉ុន្តែគួរស្តាយណាស់ដែលរូបថតតាំងប៉ុន្មាន មិនបានជាប់កន្លែងទុកទឹកទាំងនេះ ទឹកនេះហើយ ដែលអាចនឹងចិញ្ចឹមបណ្តាជន ជាច្រើនក្នុងតំបន់គ្មានផ្លូវទឹក ឲ្យរស់ជីវិតបានរៀងកល់ឆ្នាំ (មើលគំនូរ លេខ ៧ ឯ.ស. ៣១៧) ៗ

ហុការ៍

# មរណានុស្សតិកម្មដ្ឋានពិស្តារ


ព្រះគ្រូវិមលបញ្ញា អ៊ុម ស៊ូរ

អាចារ្យក្នុងព្រះរាជបណ្ណាល័យកម្ពុជា


ប្រែចេញពីបាលីវិសុទ្ធិមគ្គ

-១-

## និងវិនិច្ឆ័យក្នុងមរណានុស្សតិកម្មដ្ឋាននិទ្ទេស

តត្ថមរណសតិយាភាវនានិទ្ទេសេ ក្នុងមរណានុស្សតិភាវនានិទ្ទេស នោះ មានសេចក្តីថា ព្រះយោគាវចរនឹងចម្រើននូវមរណានុស្សតិកម្មដ្ឋាន នោះ គប្បីរលឹកដល់សេចក្តីស្លាប់ ឲ្យជានិច្ចជាប់នៅក្នុងសន្តាន ។

ឯមរណនោះ សំដៅយកសេចក្តីដែលដាច់ជីវិតិន្ទ្រិយ ដែលមានកំណត់ដោយភពតែ ១ គឺជាកើតឡើងក្នុងភពណា ជាសត្វមានជីវិតហើយ ដល់ចុតិទម្លាយខន្ធសូន្យដាច់ជីវិតិន្ទ្រិយ ទៅចាកភពនោះបានឈ្មោះថា មរណ សេចក្តីមរណយ៉ាងនេះ គួរនឹងយកមកជាអារម្មណ៍នៃមរណានុស្សតិកម្មដ្ឋានបាន ។

ឯមរណមាន ៣ ប្រការទៀតគឺ សមុច្ឆេទមរណ, ខណិកមរណ, សម្មតិមរណ ។ មរណទាំង ៣ នេះ មិនគួរនឹងយកមកជាអារម្មណ៍នៃមរណា-

នុស្សតិកម្មដ្ឋានឡើយ សមុច្ឆេទមរណនោះ បានខាងឯព្រះអរហន្ត ដែលកាត់បង់នូវវដ្តទុក្ខ កិច្ចដែលសម្រេចដល់ព្រះអរហត្ត កាត់បង់នូវទុក្ខក្នុងសង្សារវដ្តបាននោះ ចាត់ជាមរណប្រការ ១ ហៅថាសមុច្ឆេទមរណ ខណិកមរណនោះ បានខាងសង្ខារធម៌ដែលរលត់រលាយគ្រប់ៗខន្ធ គឺថាចិត្តនិងចេតសិក ដែលកើតឡើងជាឧប្បាទខណ តាំងនៅជាឋិតិខណ រលត់ទៅជាភង្គខណ នោះចាត់ជាមរណប្រការ ១ ហៅថាខណិកមរណ សម្មតិមរណនោះ បានខាងសេចក្តីស្លាប់ ដែលលោកសម្មតិ ដោយលោកវោហារហៅថាដើមឈើស្លាប់ ទង់ដែងស្លាប់ ដែកស្លាប់ជាដើម ចាត់ជាមរណប្រការ ១ ហៅថាសម្មតិមរណ ក៏មរណទាំង ៣ ប្រការនេះ ព្រះយោគាវចរ កុំប្រាថ្នាយកមកជាអារម្មណ៍ ក្នុងកាលដែលចម្រើនមរណា-នុស្សតិកម្មដ្ឋាននោះឡើយ មរណដែលគួរទឹងយកមកជាអារម្មណ៍នោះ ព្រះអដ្ឋកថាប្រាថ្នាយកមរណៈ ២ ប្រការ គឺ កាលមរណ ១ អកាលមរណ ១ កាលមរណនោះ គឺស្លាប់ដោយអស់បុណ្យអស់អាយុ អធិប្បាយថាសត្វទាំងពួងដែលមានកុសល ជាជនកកម្មនាំឲ្យបដិសន្ធិ ក្នុងទីដែលជាសុខ បើកុសលដែលជាឧបត្ថម្ភកគាំទ្រនោះ មិនបានទំនុកបម្រុងរហូតទៅ បើទុកជាមានបច្ច័យគឺអាហារដែលតអាយុ នោះនៅមានបរិបូណ៌ក្តី ក៏គង់មិនអាចនិងវឌ្ឍនាការចម្រើនទៅបាន និងដល់នូវកិរិយាច្យុតិ ចាកខន្ធ ដាច់ជីវិត-ន្ទ្រិយ ព្រោះហេតុកេកុសល ឧបត្ថម្ភកតទៅពុំបាន មរណៈយ៉ាងនេះហៅថា បុញ្ញក្ខយមរណៈ គឺស្លាប់ដោយអស់បុណ្យ មានពាក្យដីកាចារ្យចូល

មកថា បុញ្ញក្ខយមរណ ស្លាប់ដោយអស់បុណ្យនេះថា ដោយសត្វដែលកើតក្នុងសម្បត្តិភព គឺភពបរិបូណ៌ដោយសម្បត្តិ ថាបើសត្វដែលកើតក្នុងវិបត្តិភព គឺភពប្រកបដោយសេចក្ដីទុក្ខលំបាកដរាបដល់អស់បាប អស់អកុសលកម្មនៃខ្លួន ហើយទើបធ្វើកាលកិរិយាចាកវិបត្តិភពនោះទៅ មរណយ៉ាងនេះហៅថា បាបក្ខយមរណ ស្លាប់ដោយអស់បាប ។

ឯអាយុក្ខយមរណនោះ គឺស្លាប់ដោយអស់អាយុនោះ ព្រះអដ្ឋកថាលោកពោលថា សត្វដែលកេតគតិសម្បត្តិ, កាលសម្បត្តិ, អាហារសម្បត្តិមិនបាន គឺមិនបានមានគតិបរិបូណ៌ដូចទេវតា ដែលបរិបូណ៌ដោយគតិមិនបានមានកាលដ៏បរិបូណ៌ដូចបុគ្គលក្នុងបឋមកប្ប ដែលបរិបូណ៌ដោយកាល មិនបានមានអាហារដ៏បរិបូណ៌ដូចជនក្នុងឧត្តរកុរុទ្វីប ដែលបរិបូណ៌ដោយអាហារ មានអាយុតិចប្រមាណ ១០០ ឆ្នាំ ដូចមនុស្សប្រុសស្រីក្នុងកាលសព្វថ្ងៃនេះក្ដី សត្វដែលបរិបូណ៌ដោយកាល និងអាហារ និងអាយុយឺនច្រើនជាង ១ សែនឆ្នាំនោះក្ដី តែបណ្ដាសត្វដែលស្ថិតនៅដរាបដល់អស់អាយុហើយ ទើបធ្វើកាលកិរិយាទៅទាំងប៉ុន្មាន បានឈ្មោះថាអាយុក្ខយមរណដូចគ្នាទាំងអស់ អ្នកប្រាជ្ញគប្បីចូលចិត្តថា សត្វដែលអស់បុណ្យ អស់បាប អស់អាយុ ហើយស្លាប់ទៅនោះ បានឈ្មោះថាកាលមរណគឺស្លាប់ក្នុងកាលដ៏គួរគប្បីស្លាប់ ។

ឯអកាលមរណ គឺស្លាប់ក្នុងកាលដ៏មិនសមគួរនឹងស្លាប់នោះ អធិប្បាយថា សត្វទាំងឡាយដែលមានខន្ធបែកធ្លាយដោយអំណាចឧបច្ឆេទកកម្ម គឺ

កម្មចូលទៅជិតផ្តាច់បង់នូវជីវិត ដូចស្តេចទុសិមារពេជនិងស្តេចកលាបុកដ ជាដើមដែលប្រទូសរ៉ាយដល់ខន្តីវាទីតាបសហើយផែនដីបើកចន្លោះឲ្យធ្លាក់ចុះទៅក្នុងអវិចីនរកនោះ បានឈ្មោះថាអកាលមរណៈៗនេះគឺស្លាប់ក្នុងកាលមិនគួរស្លាប់ មិនតែម្ប៉ុណ្ណោះ សត្វទាំងឡាយដែលមានបាបកម្ម មានគេមកកាប់ មកចាក់ឲ្យស្លាប់ ដោយគ្រឿងសស្ត្រាវុធធ្វើកាលកិរិយាទៅដោយព្យាយាមនៃបុគ្គលដទៃ ឬឲ្យកើតមានអកុសលចិត្តប្រហារជីវិតនៃខ្លួនដោយខ្លួនឯងក្តី សេចក្តីស្លាប់យ៉ាងនេះក៏បានឈ្មោះថាអកាលមរណៃដែរ ក៏មរណទាំង ២ ប្រការ គឺកាលមរណ និងអកាលមរណ មានន័យដូចពណ៌នាមកនេះ សមគួរនឹងយកមកជាអារម្មណ៍ក្នុងកាលដែលនឹងចម្រើនមរណានុស្សតិកម្មដ្ឋាននោះឯង ៗ

តំ ភាវេត្វា មេ ចរ ហោន្តេ នេ ៗ លរ ៗ យោ និ សោម-
ចសិ ភារេបវ ត្តេ តោ ៗ

សេចក្តីថា ព្រះយោគាវចរអ្នកប្រាថ្នា នឹងចម្រើននូវមរណានុស្សតិ-កម្មដ្ឋាននោះ គប្បីចូលទៅកាន់ទីសេនាសនដ៏ស្ងាត់នៅតែម្នាក់ឯង ហើយគប្បីបរិកម្មថា មរណំ ករិស្សតិ ជីវិតិន្ទ្រិយំ ឧបច្ឆិជ្ជិស្សតិ សេចក្តីស្លាប់នឹងមានជីវិតិន្ទ្រិយនឹងដាច់ ដូច្នេះក៏បានឬថា មរណំ ៗសេចក្តីស្លាប់ៗដូច្នេះក៏បានកាលដែលនឹងធ្វើ បរិកម្មនោះគប្បីតាំងមនសិការគឺធ្វើទុកក្នុងចិត្តជាឧបាយឲ្យមាំ កុំធ្វើមនសិការដោយឧបាយគ្មាន មានពាក្យដ-

កាចារ្យវិសជ្ជនាថាដែលឲ្យធ្វើមនសិការកំណត់ដោយឧបាយ គឺថាឲ្យមានសតិនឹងបញ្ញាពិចារណាឲ្យឃើញធម្មសំវេគថា សេចក្ដីស្លាប់នោះនឹងមានដល់យើងដោយពិត ជីវិតនៃយើងនេះនឹងដាច់ដោយពិត គប្បីពិចារណាឲ្យឃើញសំវេគដូច្នេះ កុំបរិកម្មទៅតែមាត់ទទេចិត្តមិនមានសំវេគសោះ បើបរិកម្មទៅតែមាត់ហើយមិនបានតាំងបញ្ញាចុះពិចារណា ឲ្យឃើញធម្មសំ-វេគក្នុងសេចក្ដីស្លាប់នោះទេ ក៏បានឈ្មោះថាធ្វើមនសិការដោយរកឧបាយគ្មាន កាលបើព្រះយោគាវចរប្រព្រឹត្តនូវកិច្ចមនសិការ ដោយរកឧបាយគ្មាននោះ ខណកាលរលឹកដល់សេចក្ដីស្លាប់ នៃបុគ្គលដែលជាទីស្រឡាញ់ ក៏កើតសេចក្ដីស្រណោះ ឧបមាដូចបុគ្គលដែលរឭកដល់មាតាបង្កើត និងកូនដែលជាទីស្រឡាញ់ដែលដល់នូវទីអនិច្ចកម្មកន្លងទៅ ក៏នឹងកើតសេចក្ដីសោកសេចក្ដីខ្សឹកខ្សួល កាលបើរឭកដល់សេចក្ដីស្លាប់របស់ជន ដែលខ្លួនស្អប់ក្ដីមិនស្រឡាញ់ ក៏នឹងកើតសេចក្ដីត្រេកអរទៅវិញ ដូចជនដែលមានពៀររលឹកដល់សេចក្ដីស្លាប់នៃគ្នា និងគ្នា កាលបើរលឹកដល់សេចក្ដីស្លាប់ នៃបុគ្គលដែលខ្លួនមិនស្អប់មិនស្រឡាញ់នោះ ក៏នឹងព្រងើយ ៗ មិនមានសេចក្ដីសំវេគដូចឆវទាហិកជនគឺអ្នកសម្រាប់ដុតខ្មោច កាលបើឃើញសាកអសុភហើយ នឹងរកសេចក្ដីសំវេគគ្មាន ថាបើរលឹកដល់សេចក្ដីស្លាប់របស់ខ្លួនវិញ ក៏កើតសេចក្ដីតក់ស្លុតក្នុងចិត្ត ដូចបុគ្គលដែលមានសន្ដានប្រកបដោយសេចក្ដីខ្លាចច្រើន កាលណាបើបានឃើញពេជឃាដ កាន់នូវដាវលើកឡើងគ្រវីក្នុងទីចំពោះមុខ ក៏មានទុចិត្តនោះ

តក់ស្លុតក្រៃពេក សេចក្តីនេះអ្នកប្រាជ្ញគប្បីសន្និដ្ឋានក្នុងចិត្តថា ហេតុដែលនឹងឲ្យកើតសេចក្តីសោយសោកក្តី សេចក្តីត្រេកអរក្តី សេចក្តីកេសំវេគគ្មានក្តី សេចក្តីតក់ស្លុតក្នុងចិត្តក្តី ហេតុទាំងអស់នេះក៏អាស្រ័យអំពីកិរិយាប្រាសចាកសតិបញ្ញាកេសំវេគគ្មាន ព្រោះធ្វើមនសិការដោយកេឧបាយគ្មាន បរិកម្មថា មរណំ ៗ នោះត្រឹមតែមាត់ទេ មិនបានយកសតិបញ្ញាប្រកបចូលឲ្យឃើញធម្មសំវេគពិត ៗ ផង ត្រឡប់ទៅជាដូច្នោះបាន បើធ្វើមនសិការដោយឧបាយញុំាងសតិបញ្ញា ឲ្យជ្រៀតជ្រែកចូលបានទានធម្មសំវេគ តាំងនៅក្នុងសន្តានហើយឯណាឡើយ ក៏នឹងទៅជាដូច្នោះបាន នឹងចម្រើនជាគុណវុឌ្ឍិដ៏ប្រសើរ បើទុកជារលឹកដល់សេចក្តីស្លាប់នៃបុគ្គលដ៏ជាទីស្រឡាញ់ក្តី ក៏មិនសោយសោករលឹកដល់សេចក្តីស្លាប់នៃបុគ្គលមានពៀរដែលខ្លួនស្អប់ខ្ពើមក្តី ក៏មិនត្រេកអរ រលឹកដល់សេចក្តីស្លាប់នៃបុគ្គលដែលខ្លួនមិនស្អប់ មិនស្រឡាញ់ក្តី ក៏មិនបានព្រងើយគង់នឹងកើតសេចក្តីសំវេគបរិបូណ៌ទៅក្នុងសន្តាន បើទុកជារលឹកដល់សេចក្តីស្លាប់នៃខ្លួនទៀត ក៏គង់មិនតក់ស្លុតប៉ុន្មាន និងប្រាសចាកសេចក្តីតក់ស្លុតទៅបាន ។

តស្មា តត្ថ តត្ថ ហតមតសត្តេ ឱលោកេត្វា ទិដ្ឋបុព្ព-
សម្បត្តីនំ មតានំ សត្តានំ មរណំ អាវជ្ជិត្វា សតិញ្ច សំវេគ
ញាណញ្ច យោជេត្វា មរណំ ភវិស្សតិ ។

ហេតុដូច្នោះ ព្រះយោគាវចរដែលចម្រើនមរណានុស្សតិកម្មដ្ឋាននោះ

គប្បីពិចារណានូវសេចក្តីស្លាប់នៃសត្វទាំងឡាយ ដែលជាសត្រូវសម្លាប់ក្តី ស្លាប់ឯងក្តី ដែលគេពោលនៅក្នុងទីទាំងពួង មានទីស្មសានជាដើមដែលខ្លួនបានឃើញអំពីមុន គប្បីពិចារណាយកមកជាអារម្មណ៍ ក្នុងកាលដែលចម្រើនមរណានុស្សតិកម្មដ្ឋាននោះ សតិញ្ច បញ្ញាញ្ច សំវេគញ្ច យោជេត្វា គប្បីធ្វើមនសិការដោយឧបាយ ញុំាងសតិនិងបញ្ញា និងធម្មសំវេគឲ្យកើតឡើងហើយ គប្បីធ្វើបរិកម្មដោយន័យមានដើមថា មរណំ ភវិស្សតិ ជីវិតិន្ទ្រិយំ ឧបច្ឆិជ្ជិស្សតិ (សេចក្តីប្រែដូចមុន) កាលបើព្រះយោគាវចរប្រព្រឹត្តដោយវិធី ដែលព្រះអដ្ឋកថាចារ្យសម្តែងទុកដូច្នេះ ពួកខ្លះដែលមានបញ្ញិន្ទ្រិយមុតក្លានោះ ក៏អាចឃាត់បង់នូវនីវរណធម៌ទាំង ៥ មានកាមឆន្ទជាដើម និងមានមរណារម្មណ៍តាំងមាំនិងបានសម្រេចឧបចារសមាធិ មិនបានព្រួយលំបាកពេកព្រោះមានបញ្ញិន្ទ្រិយមុតក្លា ។

ឯព្រះយោគាវចរដែលមានបញ្ញិន្ទ្រិយ មិនបានមុតក្លា ក៏មិនបានសម្រេចក្នុងកិច្ចនៃកម្មដ្ឋានវិធីប៉ុណ្ណោះទេ បើមានប្រាថ្នាចម្រើនក្នុងមរណានុស្សតិកម្មដ្ឋានតទៅ ក៏គប្បីរលឹកដល់សេចក្តីស្លាប់ដោយអាការ ៨ គឺ ៖

១.វធកបច្ចុបដ្ឋាន ឲ្យព្រះយោគាវចររលឹកដល់សេចក្តីស្លាប់ឲ្យឃើញប្រាកដ ដូចនាយពេជ្ឈឃាដដែលមានដៃកាន់ដាវដ៏មុត មានពាក្យបុច្ឆាសួរថា ហេតុអ្វីទើបឲ្យរលឹកដូច្នេះ វិសជ្ជនាថា បានជាឲ្យរលឹកយ៉ាង

ដូច្នេះនោះ ព្រោះឲ្យឃើញថា ការដែលកើតនិងស្លាប់នោះមកព្រមគ្នា សត្វទាំងឡាយដែលកើតមកក្នុងលោកនេះ តែងមានជរានិងខណិកមរណ ជាប់ប្រឋិតជាមួយនឹងខ្លួនមកគ្រប់រូបគ្រប់នាម យថា ហិ អហិច្ឆត្តកំ មកុលំ មត្ថកេន បំសុំ គហេត្វា ឧគ្គច្ឆតិ ប្រៀបដូចក្រពុំផ្សិត ដែលទុលឡើងផុតពីផែនដី តែងនាំយកមកនូវធូលីអាចម៍ដីឡើងមកផង តេសំ បដិសន្ធិចិត្តំ ឧប្បាទានន្តរមេវ ជរំ បត្វា សត្វទាំងឡាយ ដែលកាន់យកនូវបដិសន្ធិកំណើតក្នុងលោកនេះចាប់ដើមអំពីបដិសន្ធិហើយ ក្នុងលំដាប់ឧប្បាទខណនៃបដិសន្ធិចិត្តនោះក៏ដល់នូវសេចក្ដីជរានិងមរណៗ ជាប់ជិតតាមមកជាមួយនឹងខ្លួន បព្វតសិខរតោ បតិតសិលា-វិយ ប្រៀបដូចដុំថ្ម ដែលបែកធ្លាក់ចុះចាកកំពូលភ្នំ តែងកាន់យកនូវ ដើមឈើ និង គុម្ពស្មៅ ដែលជាប់ជាមួយនឹងខ្លួនមកផង មរណំ បិ-សហជាតិយា អាគតំ កិរិយាកើតនិងស្លាប់នេះ ជាប់មកព្រមគ្នា ជាមួយសហជាតធម៌ ព្រោះថាកើតមានហើយ ស្លាប់ក៏មានផង បុគ្គល ដែលកើតមកនេះ តែងនឹងស្លាប់ទៅវិញដោយពិត ចាប់ដើមអំពីកើតឡើង ហើយ ក៏បែរមុខចំពោះទៅកាន់សេចក្ដីស្លាប់មែនពិត ដូចព្រះអាទិត្យ ឧគ្គមនាការរះឡើងហើយក៏បែរមុខចំពោះទៅកាន់ទីអស្តង្គត មិនបានថយ ក្រោយត្រឡប់ទៅកាន់វិថីដំណើរនោះឡើយ មួយវិញទៀតឧបមាដូច ទទឹក

ដែលហូរចុះមកអំពីភ្នំ ប្រព្រឹត្តទៅរហ័សមិនអាចត្រឡប់ក្រោយ តែបណ្តាដើមឈើនិងដើមស្មៅដែលធ្លាក់ចុះមកក្នុងខ្សែទឹកនោះ សូម្បីតែវត្ថុណា ១ នឹងអាចត្រឡប់វិលក្រោយគ្មានឡើយ សេចក្តីនេះមានឧបមាដូចម្តេចមិញ ថាមានឧបមេយ្យដូចអាយុសង្ខារសត្វទាំងពួង ដែលកន្លងទៅ ៗ មិនត្រឡប់ក្រោយ តាំងមុខចំពោះទៅកាន់សេចក្តីស្លាប់មិនរវេរវាយ ហេតុដូច្នោះ ព្រះសម្មាសម្ពុទ្ធសំដែងទុកថា យមេការត្តឹបឋមំ គព្ភេវសតិមាណវោ អព្ភុដ្ឋិតោវសោយាតិ សគច្ឆំននិវត្តតីតិ ថាសត្វដែលនៅក្នុងគភ៌នៃមាតា ចាប់ដើមអំពីខណតាំងបដិសន្ធិ ក្នុងវេលារាត្រីនោះ ហើយក៏តាំងប្រែទៅ ៗ កាលដើមជាកលលរូប ហើយប្រែទៅជា អព្វុទ ជាបេសិ ជាឃន ចេះតែប្រែទៅ ៗ ដរាបដល់មរណភាពជាទីបំផុត នឹងរកទៀងរកប្រាកដមិនមាន ប្រៀបដូចពពកដែលតាំងឡើងហើយ ក៏ដល់នូវការអណ្តែតឃ្លាតទៅ ៗ ដរាបដល់សូន្យបាត់ ៗ

មានពាក្យដីកាចារ្យវិសជ្ជនាថា ដែលមានព្រះពុទ្ធភាសិតថា សត្វដែលតាំងបដិសន្ធិ ក្នុងវេលារាត្រីយប់នោះ គឺថាដោយ យេភុយ្យន័យ ថាជម្មតាសត្វដែលកាន់យកបដិសន្ធិ ក្នុងវេលាយប់នោះមានដោយច្រើន ដែលនឹងកាន់យកបដិសន្ធិក្នុងវេលាកណ្តាលថ្ងៃនោះមានដោយតិច ហេតុដូច្នោះអ្នកប្រាជ្ញគប្បីចូលចិត្តថា តើសព្ទនោះព្រះអង្គសំដែងដោយ យេភុយ្យន័យ ឯអាយុនៃសត្វដែលកន្លងទៅ ៗ ដោយន័យដូចពណ៌នាមក

ដូច្នេះនោះ ព្រោះឲ្យឃើញថា ការដែលកើតនិងស្លាប់នោះមកព្រមគ្នា សត្វទាំងឡាយដែលកើតមកក្នុងលោកនេះ តែងមានជរានិងខណិកមរណ ជាប់ប្រតិតជាមួយនឹងខ្លួនមកគ្រប់រូបគ្រប់នាម យថាហិ អហិឆត្តកា មកុលំ មត្ថកេន បំសុំ គហេត្វា ឧគ្គច្ឆតិ ប្រៀបដូចក្រពុំផ្សិត ដែលដុះឡើងផុតពីផែនដី តែងនាំយកមកនូវធូលីអាចម៍ដីឡើងមកផង តេសំ បដិសន្ធិចិត្តំ ឧប្បាទានន្តរមេវ ជរំ បត្វា សត្វទាំងឡាយ ដែលកាន់យកនូវបដិសន្ធិកំណើតក្នុងលោកនេះចាប់ដើមអំពីបដិសន្ធិហើយ ក្នុងលំដាប់ឧប្បាទខណនៃបដិសន្ធិចិត្តនោះ ក៏ដល់នូវសេចក្ដីជរានិងមរណៗ ជាប់ជិតតាមមកជាមួយនឹងខ្លួន បព្វតសិខរតោ បតិតោ សិលា-វិយ ប្រៀបដូចដុំថ្ម ដែលបែកធ្លាក់ចុះចាកកំពូលភ្នំ តែងកាន់យកនូវដើមឈើ និង គុម្ពស្មៅ ដែលជាប់ជាមួយនឹងខ្លួនមកផង មរណំបិ-សហជាតិយា អាគតំ កិរិយាកើតនិងស្លាប់នេះ ជាប់មកព្រមគ្នា ជាមួយសហជាតធម៌ ព្រោះថាកើតមានហើយ ស្លាប់ក៏មានផង បុគ្គល ដែលកើតមកនេះ តែងនឹងស្លាប់ទៅវិញដោយពិត ចាប់ដើមអំពីកើតឡើង ហើយ ក៏បែរមុខចំពោះទៅកាន់សេចក្ដីស្លាប់មែនពិត ដូចព្រះអាទិត្យ ឧគ្គមនាការរះឡើងហើយក៏បែរមុខចំពោះទៅកាន់ទីអស្តង្គត មិនមានថយ ក្រោយត្រឡប់បាតវិញដំណើរនោះឡើយ ម្យ៉ាងទៀតឧបមាដូច ទទឹក

ដែលហូរចុះមកអំពីភ្នំ ប្រព្រឹត្តទៅរហ័សមិនអាចត្រឡប់ក្រោយ តែបណ្ដាដើមឈើនិងដើមស្មៅដែលធ្លាក់ចុះមកក្នុងខ្សែទឹកនោះ សូម្បីតែវត្ថុណា ១ នឹងអាចត្រឡប់វិលក្រោយគ្មានឡើយ សេចក្ដីនេះមានឧបមាដូចម្ដេចមិញ ថាមានឧបមេយ្យដូចអាយុសង្ខារសត្វទាំងពួង ដែលកន្លងទៅ ៗ មិនត្រឡប់ក្រោយ តាំងមុខចំពោះទៅកាន់សេចក្ដីស្លាប់មិនរារែកដូច្នោះឯង ហេតុដូច្នោះ ព្រះសម្មាសម្ពុទ្ធសំដែងទុកថា យមេករត្តឹ បឋមំ គព្ភេ វសតិ មាណវោ អព្ភុដ្ឋិតោវ សោ យាតិ ស គច្ឆំ ន និវត្តតីតិ ថាសត្វដែលទៅក្នុងគភ៌នៃមាតា ចាប់ដើមអំពីខណៈតាំងបដិសន្ធិ ក្នុងវេលារាត្រីនោះ ហើយក៏តាំងប្រែទៅ ៗ កាលដើមជាកលលរូប ហើយប្រែទៅជា អព្ពុទ ជាបេសិ ជាឃន រេះតែប្រែទៅ ៗ ដរាបដល់មរណភាពជាទីបំផុត នឹងរកទៀងរកប្រាកដមិនមាន ប្រៀបដូចពពកដែលតាំងឡើងហើយ ក៏ដល់នូវការអណ្ដែតឃ្លាតទៅ ៗ ដរាបដល់សូន្យបាត់ ៗ

មានពាក្យដីកាចារ្យវិសជ្ជនាថា ដែលមានព្រះពុទ្ធភាសិតថា សត្វដែលតាំងបដិសន្ធិ ក្នុងវេលាត្រីយប់នោះ គឺថាដោយ យេភុយ្យន័យ ថាធម្មតាសត្វដែលកាន់យកបដិសន្ធិ ក្នុងវេលាយប់នោះមានដោយច្រើន ដែលនឹងកាន់យកបដិសន្ធិក្នុងវេលាកណ្ដាលថ្ងៃនោះមានដោយតិច ហេតុដូច្នោះអ្នកប្រាជ្ញគប្បីចូលចិត្តថា គឺសត្វនោះព្រះអង្គសម្ដែងដោយ យេភុយ្យន័យ ឯអាយុនៃសត្វដែលកន្លងទៅ ៗ ដោយន័យដូចពណ៌នាមក

ដូច្នេះ ហេតុនេះព្រះអដ្ឋកថាលោកឧបមាទុកថា ជីវិតដែលអស់ទៅតិចទៅនោះ ដូចអាការដែលអស់ទៅនៃទឹកក្នុងស្ទឹងតិចទៅ ៗ រឿយ ៗ ដោយអំណាចកំដៅនៃព្រះអាទិត្យ ក្នុងគិម្ហរដូវដល់នូវសភាវហួតរីងអស់ទៅគ្រប់ថ្ងៃគ្រប់វេលា ពុំនោះសោតដូចផ្លែឈើ ដែលអាបោធាតុមិនបានជ្រាបដល់ ទឹងជ្រុះចាកដើមក្នុងវេលាព្រឹក ក៏ធម្មតាផ្លែឈើដែលមានរស មានពណ៌ផ្សេង ៗ អាស្រ័យទឹករសផែនដី ដែលទទឹកសើមជ្រាបឡើងទួទៅក្នុងដើម ទើបដល់នូវវឌ្ឍនាការចម្រើនទៅជាយ៉ាងល្អ បានជាបើរសផែនដីមិនអាចសើមជ្រាបឡើងទៅក្នុងដើមបាន ផ្លែឈើទាំងនោះ ក៏ទឹងដល់នូវសេចក្ដីវិនាសចាកដើមមិនខាន សេចក្ដីនេះមានឧបមាដូចម្ដេចមិញ ថាឧបមេយ្យដូចជីវិតសត្វទាំងពួងនេះ អាស្រ័យនូវរសនៃអាហារដែលសើមជ្រាបទៅក្នុងកាយ ថាបើរសអាហារ មិនអាចជ្រាបទៅបានទេ ក៏ទឹងដល់នូវសេចក្ដីហួតរីងដាច់ ជីវិតិន្ទ្រិយទៅមិនខាន យ៉ាងនោះ ក៏ឯរូបនិងនាមទាំងពួងនេះកាលបើជរា ព្យាធិ មរណ បៀតបៀនហើយ ក៏ដល់នូវសេចក្ដីគាំគ្រា ស្វិតស្រពោនឈឺចាប់លំបាកវេទនា មានខ្យល់អស្សាសបស្សាសដាច់សូន្យទៅ សល់នៅតែរាងកាយម្យ៉ាង ជាអសុភសាធារណលើផែនដីដូចគ្នា ប្រៀបដូចភាជនដីដែលបុគ្គលប្រហារដោយដំបង ទឹងបែកធ្លាយខ្ចាត់ខ្ចាយទៅដូច្នោះឯង ហេតុដូច្នោះ ព្រះសម្មាសម្ពុទ្ធទ្រង់ភាសិត នូវព្រះគាថាយ៉ាងនេះទុកមក ។

អច្ចយន្តិ អហោរត្តា ជីវិតំ ឧបរុជ្ឈតិ អាយុ ខីយតិ
មច្ចានំ កុន្នទីនំវ ឱទកំ ផលានមិវ បក្កានំ ទាតោ-
បតនតោ ភយំ ឯវំ ជាតាន មច្ចានំ និច្ចំ មរណតោ ភយំ
យថាបិ កុម្ភការស្ស កតំ មត្តិកភាជនំ ខុទ្ទកញ្ច
មហន្តញ្ច យំ បក្កំ យញ្ច អាមកំ សព្វំ ភេទបរិយន្តំ ឯវំ-
មច្ចាន ជីវិតំ ឧស្សាវោវ តិណគ្គម្ហិ សុរិយស្សុគ្គមនំ បតិ
ឯវំ អាយុ មនុស្សានំ មា មំ អម្ម និវារយាតិ ។

*សេចក្តីថា ថ្ងៃនិងយប់ទាំងឡាយប្រព្រឹត្តកន្លងទៅយ៉ាងណា ជីវិតសង្ខារនៃសត្វទាំងឡាយ ក៏រេះរៃរលត់បាត់ទៅ ៗ យ៉ាងនោះឯង ទឹកក្នុងស្ទឹងដែលតែងរីងហួតទៅយ៉ាងណា អាយុសង្ខារនៃសត្វទាំងឡាយ ក៏តែងអស់ទៅជាធម្មតាយ៉ាងនោះ ភ័យរបស់ផ្លែឈើទុំទាំងឡាយ កើតឡើងអំពីកិរិយាជ្រុះចុះចាកដើមយ៉ាងណា ភ័យនៃសត្វទាំងឡាយកើតឡើងអំពីសេចក្តីស្លាប់ជានិច្ចយ៉ាងនោះ ភាជនដីឯណាតូច ឬ ធំ ចាស់ ឬ ថ្មី ដែលស្មូនឆ្នាំងធ្វើហើយ ហេតុដោយភាជនទាំងនោះ នឹងដល់នូវកិរិយាបែកធ្លាយជាបំណែកជាទីបំផុតយ៉ាងណា ជីវិតសង្ខារនៃសត្វទាំងឡាយក៏នឹងអន្តរាយទៅយ៉ាងនោះ ទឹកសន្សើមដែលជិតជាប់នៅចុងស្មៅហើយហួតរីងបាត់ទៅ ព្រោះអាស្រ័យនូវកំដៅនៃព្រះអាទិត្យយ៉ាងណា អាយុសង្ខារ*

របស់មនុស្សសត្វទាំងឡាយ ក៏អស់ទៅយ៉ាងនោះឯង ហាក់ដូចជាទឹង ពោលអង្វរមកវិញថាម្នាលអ្នក ៗ កុំឃាត់ខ្ញុំឡើយ ឯវធកបច្ចុប្បដ្ឋានតោមរណំអនុស្សរិតព្វំ ព្រះយោគាវចរ ដែលចម្រើននូវមរណានុស្សតិកម្មដ្ឋាននោះ គប្បីរលឹកនូវសេចក្ដីស្លាប់ ដោយវធកបច្ចុប្បដ្ឋានដូចន័យដែលពោលមកនេះ ។

២- សម្បត្តិវិបត្តិ គឺឲ្យព្រះយោគាវចររលឹកនូវសេចក្ដីស្លាប់ដោយការបរិបូណ៌និងវិនាស គឺឲ្យរលឹកឃើញថាសត្វទាំងពួង ដែលកើតមកនេះ បរិបូណ៌ហើយមានសេចក្ដីវិនាសទៅវិញ ដែលនឹងល្អនឹងចម្រើនទៅនោះ កាលដែលវិបត្តិមិនទាន់មកដល់គ្រប់សង្កត់នៅឡើយ បើវិបត្តិមកដល់គ្របសង្កត់ហើយ នឹងវិនាសឃ្លាតចាកវត្ថុគ្រប់ប្រការ សេចក្ដីល្អនឹងចម្រើនក៏បាត់ទៅ សេចក្ដីទុក្ខអាក្រក់នឹងចូលមក កាយនិងចិត្តដែលធ្លាប់ជាសុខ ហើយក៏ត្រឡប់ជាទុក្ខវិញ មិនធ្លាប់សោយសោក ហើយក៏ត្រឡប់ជាសោយសោកវិញ ដូចយ៉ាងព្រះបាទធម្មាសោករាជ ស្ដេចមានបុញ្ញានុភាពសោយរាជសម្បត្តិព្រមព្រៀងដោយសេចក្ដីសុខ ដល់នូវឥស្សរិយភាពជាធំក្នុងភូមិមណ្ឌលជម្ពូទ្វីប ស្ដេចបានបរិច្ចាគទានក្នុងពុទ្ធសាសនា អស់ព្រះរាជទ្រព្យ ១០០ កោដិ មានអាណាចក្រផ្សាយទៅខាងក្រោមផែនដី ១យោជន៍ ខាងលើអាកាស ១យោជន៍ ប្រកបដោយសិរីសម្បត្តិសុខយ៉ាងនោះ កាលដែលមរណមកដល់ ក៏មានសេចក្ដីសោកកើតឡើងចំពោះព្រះអង្គ ហើយ

មានព្រះភក្ត្រាបែរស្មោះទៅកាន់សេចក្ដីស្លាប់មិនត្រឡប់ក្រោយឡើយ ន័យ ១ ទៀតថា សព្វំ អារោគ្យំ ព្យាធិបរិយោសានំ សព្វំ យោព្វនំ ជរាបរិយោសានំ សព្វំ ជីវិតំ មរណបរិយោសានំ សេចក្ដីថា ការនៃបុគ្គលមិនមានរោគគ្រប់ប្រការ គង់តែមានព្យាធិនៅបន្ទាប់ខាងមុខ កិរិយាដែលចម្រើនដោយ វ័យទាំងពួង គង់តែមានជរានៅបន្ទាប់ខាងមុខ សេចក្ដីរស់នៅរាល់ថ្ងៃនេះ គង់តែមានមរណ នៅបន្ទាប់ខាងមុខ សព្វោ យោ លោកសន្និវាសោ ជាតិយា អនុគតោ ជរាយ អនុសតោ ព្យាធិនា អភិភូតោ មរណេន អព្ភាហតោ សេចក្ដីថា សត្វទាំងពួងដែលអាស្រ័យនៅក្នុងលោកទាំងអស់ តែងមានជាតិទុក្ខប្រដិតតាមល្បួងលោមធ្វើឲ្យវង្វេងភ្លាត់ស្មារតី ជរាទុក្ខតែងបង្វួតតែឲ្យដល់នូវវិបត្តិផ្សេង ៗ ព្យាធិទុក្ខជាអ្នកតាមញាំញី បៀតបៀនឲ្យឈឺចាប់សព្វាង្គកាយ មរណទុក្ខជាអ្នកគ្រប់សង្កត់បំបែកទម្លាយផ្ដាច់ផ្ដិលជីវិតិន្ទ្រិយឲ្យវិនាសសាបសូន្យទៅ ហេតុនេះទើបព្រះសម្មាសម្ពុទ្ធ ទ្រង់សម្ដែងថា ៖

យថាបិ សេលា វិបុលា នភំ អាហច្ច បព្វតា សមន្តា
អនុបរិយេយ្យុំ និប្ពោថេន្តា ចតុទ្ទិសា ឯវំ ជរា ច មច្ចុ ច
អធិវត្តន្តិ បាណិនោ ខត្តិយេ ព្រាហ្មណេ វេស្សេ សុទ្ទេ
ចណ្ឌាលបុក្កុសេ ន កិញ្ចិ បរិវជ្ជេតិ សព្វមេវាភិមទ្ទតិ
ន តត្ថ ហត្ថីនំ ភូមិ ន រថានំ ន បត្តិយា ន ចាបិ មន្តយុទ្ធេន

សក្កា ជេតុំ ធនេន វា ។

សេចក្តីថា ជរក្តី មច្ចុក្តី នឹងបានវៀរលែងនូវបុគ្គលណា ១ មិនមានឡើយ តែងគ្របសង្កត់ញាំញីសព្វសត្វទាំងពួងទូទៅ គ្រប់រូបគ្រប់នាម មិនមានលើកទុកជាក្សត្រិយ៍ ជាព្រាហ្មណ៍ជាអ្នកឈ្មួញ អ្នកក្រ អ្នកចណ្ឌាលអ្នកចោលនូវអាចម៍ សេចក្តីមរណនេះ ឧបមាដូចភ្នំដែលមានដុំថ្មតាន់តែ ១ ធ្លាក់ចុះមកអំពីអាកាស ហើយវិលទៅជុំវិញក្នុងទិសទាំង ៤ សង្កត់សង្កិននូវវត្ថុទាំងពួង មិនមានវៀរទុកនូវសត្វ និង សង្ខារណា ១ ឡើយ បើនឹងតយុទ្ធដោយស្តេចមច្ចុរាជនោះ មិនមែនជាវិស័យតយុទ្ធបាន ព្រោះហេតុនោះថាក្នុងមរណសង្គ្រាមនោះ មិនមានទីតាំងនៃពលដំរី ពលសេះ ពលរថ ពលថ្មើរជើង មិនមានទីតាំងដោយគូកំពែងទ្វារទាំងពួង ដែលនឹងមានពលពាហនច្រើន ក៏មិនត្រូវការនឹងយកមកតយុទ្ធដោយមរណសង្គ្រាមនោះ មិនអាចនឹងយកមកតតាំងបានឡើយ ទោះបីនឹងឲ្យនូវមាសប្រាក់កែវមណីប៉ុន្មាន ៗ ក្តី ឬរបះមន្តអាគមយ៉ាងណា ៗ ក្តី ក៏មិនអាចនឹងយកមកតយុទ្ធដោយស្តេចមច្ចុរាជនោះបានឡើយ តំរិវត្ត-បេត្តេឆសម្បត្តិ វិបត្តិតាមរណាំអនុស្សរិតពុំ ព្រះយោគាវចរកាលកំណត់នូវសេចក្តីស្លាប់ដូច្នោះហើយ គប្បីរលឹកដល់មរណដោយសម្បត្តិវិបត្តិដូចន័យដែលបានពោលមកហើយនេះចុះ ។

៣- ឧបសំហរណតោ គឺឲ្យព្រះយោគាវចររលឹកដល់សេចក្តី

ស្លាប់ដោយ ឧបសំហារណា គឺថាឲ្យរលឹកដល់សេចក្តីស្លាប់នៃបុគ្គលដទៃ ហើយនាំចូលមកទុកដាក់ក្នុងខ្លួន កាលដែលនឹងរលឹកនោះ គប្បីរលឹកដោយអាការ ៧ ប្រការគឺ ៖

ក. យសមហត្តតោ ឲ្យរលឹកដោយការច្រើនទៅដោយយស គឺថាឲ្យរលឹកថាស្តេចមច្ចុរាជនេះ នឹងបានកោតក្រែងថាអ្នកនេះ ជាមនុស្សមានបរិវារច្រើនកុំបៀតបៀនឡើយ នឹងបានកោតក្រែងដូច្នេះមិនមានអំបាល យ៉ាងស្តេចធំទាំងឡាយមានមហាសម្មតិរាជ និង មន្ធាតុរាជ និង មហា-សុទស្សនចក្រពត្រាធិរាជ ដែលមានឥស្សរិយយស និង បរិវារយសជាយ៉ាងច្រើន បរិបូណ៌ទៅដោយពលពាហន និង ទ្រព្យសម្បត្តិ ជាឧឡារិកភាពនោះ ក៏គង់លុះក្នុងអំណាចស្តេចមច្ចុរាជទាំងអស់ នឹង ចាំពោលទៅថ្វីដល់ខ្លួនអាត្មានេះ នឹងផុតចាកអំណាចស្តេចមច្ចុរាជឯណាបាន ឯវំ យសម-ហត្តតោ អនុស្សរិតព្វំ ព្រោះហេតុនោះគប្បីរលឹកដោយការច្រើនទៅដោយយសដូចពោលមកនេះ ។

ខ. បុញ្ញមហត្តតោ ឲ្យរលឹកដោយការច្រើនទៅដោយបុណ្យ គឺថាឲ្យរលឹកដល់អ្នកមានបុណ្យទាំងឡាយ មានជោតិកសេដ្ឋី និងជដិលសេដ្ឋី និងឧគ្គសេដ្ឋី និងមេណ្ឌកសេដ្ឋី និងបុណ្ណកសេដ្ឋីជាដើម បណ្តាជនដែលមានបុញ្ញាភិសម្ភារទាំងនោះ ជោតិកសេដ្ឋីនោះ មានប្រាង្គណ៍ប្រា-សាទហើយទៅដោយកែវ ៧ ប្រការ មានផ្ទៃ ៧ ជាន់ កំពែង ៧ ជាន់សុទ្ធតែ

ហើយទៅដោយកែវ ៧ ប្រការ ហើយមានទាំងដើមកល្បព្រឹក្សកើតឡើង ក្នុងជ្រុងទាំង ៤ នៃប្រាសាទ កំណប់ ១ មានទំហំមាត់ជាង ១ យោជន៍ ១ ទៀតមានទំហំមាត់ កន្លះយោជន៍ ១ ទៀតមានមាត់ជាង ៣០០ ស៊ិន ១ ទៀតមានមាត់ជាង ១០០ ស៊ិន ហើយមានស្រ្តីកែវ មកអំពីឧត្តរកុរុទ្វីប ជាអគ្គកិរិយា ឯជដិលសេដ្ឋីនោះទៀត មានភ្នំមាសកើតឡើងខាងក្រោយផ្ទះ និងកាយកើបជញ្ជូនយកប៉ុន្មាន ៗ ក៏មិនអស់មិនមានរលោះឡើយ មេណ្ឌកសេដ្ឋីនោះ មានពពែមាសកើតឡើងដោយបុណ្យពេញទៅក្នុងទីប្រមាណ ៨ ករីសក្នុងពោះពពែនោះពេញទៅដោយវត្ថុទាំងពួង បើនឹងប្រាថ្នាវត្ថុឯណា ៗ ក៏ដកយកតែធ្នូកដែលបិទមាត់ពពែនោះចេញ ហើយវត្ថុនោះ ៗ ក៏ហូរចេញចាកមាត់ពពែនោះមក បានសម្រេចដូចសេចក្តីប្រាថ្នា បុណ្ណកសេដ្ឋីនោះ កាលដើមចេញទៅភ្ជួរស្រែ អាចម៍បំណះក៏ត្រឡប់ទៅជាមាស លុះបានធ្វើជាសេដ្ឋីហើយ ទិក្ខមិធ្វើផ្ទះនៅនោះ ក៏មានកំណប់ទ្រព្យពេញក្នុងទីនោះ អ្នកមានបុញ្ញាតិសម្ភារច្រើនផ្សេង ៗ គ្នាប្លែកវិសេសពីគ្នា ជនទាំងឡាយដទៃគេតែងពុល្យ ថាជាអ្នកមានបុញ្ញានុភាពប្រាកដក្នុងលោកនេះ ក៏អ្នកទាំងអំបាលនោះ អ្នកណា ១ មិនអាចយកទ្រព្យទាំងនោះ មកជាថ្នូរថ្លូវខ្លួន លោះខ្លួនឲ្យផុតចាកអំណាចនៃស្តេចមច្ចុរាជនោះបាន សុទ្ធតែដល់នូវមរណភាព បែកធ្លាយខន្ធបាត់ទៅទាំងអស់ និងបាច់ពោលទៅថ្វីដល់បុគ្គលប្រាកដដូចជាអាត្មានេះឯង ធ្វើម្តេចនឹងរួចចាកមរណភាពទៅបាន ឃើញបុញ្ញមហាក្សត្រោអនុស្សរិតពុំ

ព្រះយោគាវចរគប្បីរលឹកដោយការច្រើន ទៅដោយបុណ្យយ៉ាងនេះ ។

ក. ថាមមហគ្គតោ ឲ្យរលឹកដោយការច្រើនទៅដោយកម្លាំង គឺថាឲ្យរលឹកដល់បុគ្គលដែលមានកម្លាំងច្រើន ប្រាកដយ៉ាងអ្នកចម្បាប់ឈ្មោះ វាសុទេព ពលទេព ភិមសេន យុធិដ្ឋិល ហនុរជាដើម បណ្ដាអ្នកទាំងឡាយនេះ ជនម្នាក់ ៗ នោះសឹងមានកម្លាំងច្រើន ៗ កម្លាំងនាយខ្លាំងដំរី ៥០០ នាក់ ទើបស្មើនឹងកម្លាំនាយភិមសេនតែម្នាក់ ក៏បុគ្គលដែលមានកម្លាំងច្រើន ដែលគេល្បីប្រាកដក្នុងលោកនេះ ម្ដេចក៏មិនអាចតយុទ្ធដោយស្ដេចមច្ចុរាជបាន ចំណង់បើខ្លួនអាត្មានេះ នឹងអាចតយុទ្ធឯណាបានភ័យ ឯវិថាមមហគ្គតោអនុស្សរិតព្វំ ព្រះយោគាវចរគប្បីរលឹកដោយការច្រើនទៅដោយកម្លាំង ដូចពោលមកហើយយ៉ាងនេះ ។

ឃ. ឥទ្ធិមហគ្គតោ ឲ្យរលឹកដោយការច្រើនទៅដោយឫទ្ធិ គឺថាឲ្យរលឹកដល់បុគ្គលកើតមកក្នុងលោកនេ ដែលមានឫទ្ធិសក្ដានុភាពច្រើនដោយប្រការឯណា ៗ ក្ដី ក៏មិនអាចនឹងធ្វើនូវសង្គ្រាមតនឹងស្ដេចមច្ចុរាជនោះបានឡើយ ដូចព្រះមហាមោគ្គល្លានត្ថេរ ជាទុតិយសាវ័កនៃព្រះសម្មាសម្ពុទ្ធជាម្ចាស់ ប្រកបដោយឥទ្ធានុភាព ដ៏លើសជាទីឯតទគ្គ បំណែកខាងឫទ្ធិបណ្ដាសាវ័កក្នុងសាសនានេះ សាវ័កណា ១ នឹងមានឫទ្ធិដូចព្រះមហាមោគ្គល្លានេះមិនមាន ព្រះមហាមោគ្គល្លានេះ អាចញុំាងវេជយន្តប្រាសាទ របស់ទេវរាជ ឲ្យកម្រើកញាប់ញ័រដោយម្រាមមេជើងទៅបាន

ឯកិច្ចដែលនឹងចូលឈានសមាបត្តិឲ្យយ៉ាងឆាប់ មិនមានបុគ្គលឯណាស្មើ មានឫទ្ធិដល់ត្រឹមនេះហើយ ម្តេចក៏គង់ចូលទៅកាន់មាត់នៃមច្ចុរាជ ព្រមទាំងឫទ្ធិ ទាំងតេជៈអំណាច ប្រៀបដូចសត្វម្រឹគ ដែលចូលទៅកាន់មាត់នៃក្រសរាជសីហ៍ ក៏យ៉ាងខ្លួនអាត្មានេះ ធ្វើម្តេចហើយនឹងផុតអំណាចនៃស្តេចមច្ចុរាជនោះបាន ឯវំឥទ្ធិមហត្ថេរោអនុស្សរិត្វា ព្រះយោគាវចរគប្បីរលឹកដោយការច្រើនទៅដោយឫទ្ធិដូចពោលមកនេះ ។

៥- បញ្ញាមហត្ថេរោ ឲ្យរលឹកដោយការច្រើនទៅដោយបញ្ញា គឺថាឲ្យរលឹកឃើញថា បណ្តាសត្វទាំងឡាយដែលវិលវល់ នៅក្នុងលោកទុយសាគរនេះ សត្វណា ១ ដែលមានបញ្ញាឆ្លៀវឆ្លាសយ៉ាងណា ៗ ក៏គង់មិនអាចគិតរកលេសឧបាយ គេចឲ្យផុតចាកអំណាចនៃស្តេចមច្ចុរាជនោះបាន កុំបាច់និយាយឡើយដល់សត្វដទៃ ១ ដែលមានបញ្ញាបារមីតិច ទោះបើលោកមានបញ្ញាបារមីមុតក្លា ប្រាកដយ៉ាងព្រះមហាសារី-បុត្តត្ថេរ ជាបឋមសាវ័ក ប្រកបដោយបញ្ញាដ៏ក្លាហាន ចំណែកគ្រាប់ភ្លៀងធ្លាក់ចុះក្នុងល្វែងចក្រវាឡ ធ្លាក់ចុះយូរប្រមាណ ១ កល្ប ដំណក់គ្រាប់ភ្លៀងនិងល្អងគ្រាប់ភ្លៀងនោះ មានច្រើនតិចប៉ុន្មាន ៗ ព្រះសារីបុត្តលោកអាចរាប់បានទាំងអស់ បណ្តាសត្វក្នុងលោកនេះ លើកទុកតែព្រះសម្មាសម្ពុទ្ធជាម្ចាស់ចេញ ក្រៅពីនោះហើយអ្នកណា ១ ឡើយក៏នឹងមានបញ្ញាច្រើនដូចព្រះសារីបុត្តនោះគ្មាន បញ្ញាព្រះសារីបុត្តនោះថា បើបែក

ចេញជា ១៦ ៗ ហើយលើក ១៩ ចេញ យកតែចំណែក ១ ចំណែក ១ នោះមកចែកចេញជា ១៦ ហើយលើកចេញ ១៩ ចំណែកទៀត យកតែចំណែក ១ ខាងចុងបំផុតនោះមកចែកចេញជា ១៦ ចំណែកទៀតតាមន័យដូច្នេះដល់ទៅ ១៦ ដង ហើយទើបយកបញ្ញាព្រះសារីបុត្តត្ថេរ ១ ចំណិតដែលបែងជា ១៦ ចំណែកក្នុងទីបំផុតនោះ មកប្រៀបដោយបញ្ញាបណ្ឌិតជាតិទាំងពួងៗ ក៏តិចជាងបញ្ញាព្រះសារីបុត្តត្ថេរ ១ ចំណែកដែលជាបំផុតនោះទៀត ព្រះសារីបុត្តនេះបានជាទីឯតទគ្គ ចំណែកខាងបញ្ញាច្រើនបណ្ដាលោកដែលមានបញ្ញាច្រើន ដល់ទីបំផុតយ៉ាងនេះហើយ ក៏គង់មិនអាចនឹងកន្លងបង់នូវអំណាចនៃស្តេចមច្ចុរាជនោះបាន យ៉ាងខ្លួនអាត្មានេះនឹងអាចកន្លងនូវអំណាចនៃស្តេចមច្ចុរាជនោះឯណាបាន ឯវំ បញ្ញាមហត្តតោ អនុស្សរិតព្វំ ព្រះយោគាវចរ គប្បីរលឹកដោយការច្រើនទៅដោយបញ្ញា ដូចន័យដែលពោលមកហើយនេះ ។

ច- បច្ចេកពុទ្ធតោ ឲ្យរលឹកដោយព្រះបច្ចេកពុទ្ធ គឺឲ្យរឭកថា ព្រះបច្ចេកពុទ្ធទាំងពួងនោះ ប្រកបដោយបញ្ញាពលនិងវីរិយពលបានកាប់កិនញាំញីនូវសឹកសត្រូវគឺកិលេសធម៌ទាំងពួង ហើយដល់នូវបច្ចេកពោធិញាណ ត្រាស់ដឹងនូវញេយ្យធម៌ទាំងពួង ដោយខ្លួនឯង មិនមានគ្រូអាចារ្យប្រៀនប្រដៅឡើយ ក៏ព្រះបច្ចេកពុទ្ធប្រសើរដោយគុណយ៉ាងនេះហើយ ម្ដេចក៏គង់មិនផុតចាកអំណាចនៃស្តេចមច្ចុរាជនោះបាន ចំណង់

បើយ៉ាងណាគ្នានេះនឹងអាចរួចផុតមកអំពីទីណា ឯវំបច្ចេកពុទ្ធតោ អនុស្សរិតព្វំ ព្រះយោគាវចរគប្បីរលឹកដោយព្រះបច្ចេកពុទ្ធ ដូចន័យយ៉ាងនេះ ។

៥. សម្មាសម្ពុទ្ធតោ ឲ្យរលឹកដោយព្រះសម្មាសម្ពុទ្ធ គឺឲ្យរលឹកថា ព្រះសម្មាសម្ពុទ្ធ ព្រះអង្គមានព្រះរូប ព្រះនាម ព្រះសរីរកាយដ៏វិចិត្រទៅ ដោយវុត្តិសមហាបុរិសលក្ខណ គឺលក្ខណសម្រាប់មហាបុរសទាំង ៣២ និងអសីត្យានុព្យញ្ជនទាំង ៨០ គត់ ប្រសើរដោយធម្មកាយ បរិបូណ៌ដោយកែវពោលគឺ សីលខន្ធ សមាធិខន្ធ បញ្ញាខន្ធ វិមុត្តិខន្ធ វិមុត្តិញាណទស្សនខន្ធ និងបរិសុទ្ធ ដោយអាការទាំងពួង ជាបុគ្គលផល់ហើយនូវការច្រើនទៅដោយយស ដោយបុណ្យ ដោយកម្លាំង ដោយឫទ្ធិ ដោយបញ្ញា និងរកបុគ្គលឯណា ១ ប្រៀបផ្ទឹមជាគូស្មើមិនបាន អរហំសម្មាសម្ពុទ្ធោ សោបិសសីលវុឌ្ឍិនិធាតេន មហាអគ្គិក្ខន្ធោវិយ ព្រះសម្មាសម្ពុទ្ធនោះ ព្រះអង្គបានកាប់បំបាក់នូវកាំកង់នៃសំសារចក្រ ត្រាស់ដឹងនូវធម៌ទាំងពួងដោយព្រះអង្គឯង ដោយអាការមិនបានវិបរិត ព្រះអង្គមានគុណប្រសើរយ៉ាងនេះហើយ ម្តេចឡើយក៏គង់ទ្រង់រម្ងាប់នូវសំខារធម៌ទាំងពួងចូលទៅកាន់ព្រះនិព្វាន ជាស្ថានសូន្យបាតពកាទិកិលេសដោយទឹកភ្លៀងគឺមរណ ព្រះអង្គប្រៀបដូចជាគំនរភ្លើងធំដែលជាប្រទីបព្ទឹកក្នុងត្រៃភព រលមរលត់សូន្យទៅដោយអំណាចទឹក

ភ្លៀង ប្រឡែកល្បែរលាយបាត់សង្ខារកេបញ្ញត្តិមិនមាន ។

ឯវំមហានុភាវស្ស យន្នាមេតំមហេសិនោ ឆក-យេឆលដ្ឋាយ មរណំវសមាគតំ ឯលដ្ឋំ វីតសារដ្ឋំសព្វ សត្តាភិមទ្ទនំតយិទំមាទិសំសត្តំ កាថំនាភិភវិស្សតិ ។

សេចក្ដីថា ព្រះសម្មាសម្ពុទ្ធព្រះអង្គជាអ្នកស្វែងរកនូវគុណមានសីលគុណជាដើមនេះមានអានុភាពច្រើនយ៉ាងនេះ ម្ដេចក៏គង់សេចក្ដីមរណមិនមានកោតខ្លាច មិនមានអៀនខ្មាសសោះ ក៏ឯមរណនេះ ជាសង្គ្រាមជំកុងដណាលោកតែងញាំញីនូវសត្វទាំងពួង ទាំងឡាយ ដែលមិនមានខ្មាស មិនមានញញើត និងគ្របសង្កត់នូវសត្វប្រាកដ ដូចយ៉ាងអាត្មានេះផងមិនខាន ឯវំសម្មាសម្ពុទ្ធានុស្សតិតាំង ព្រះយោគា-វចរគប្បីរលឹកដោយព្រះសម្មាសម្ពុទ្ធដូចន័យយ៉ាងនេះ ។

ឯអាការទាំង ៧ ប្រការនោះ រួមចូលគ្នាជាបទ ១ ហៅថា ឧបសំហារណា ។

៤- កាយពហុសាធារណតោ ឲ្យព្រះយោគាវចររលឹកថា អយំកាយោពហុសាធារណោ អសីតិយា តាវគិមិកុ-លានំសាធារណោ សេចក្ដីថារូបកាយនៃសត្វទាំងពួងរស់សាធារណនូទៅ ដល់ពួកដង្កូវទាំងឡាយ ៨០ត្រកូល ដង្កូវដែលអាស្រ័យនូវស្បែកសម្បុរថ្ងៃ ក៏ទំពាស៊ីនូវស្បែកសម្បុរថ្ងៃដែលអាស្រ័យនៅក្នុងស្បែកបន្ទាប់

សាច់ ក៏ទំពាស៊ីនូវស្បែកបន្ទាប់សាច់ ដែលអាស្រ័យនៅក្នុងសាច់ ក៏ទំពាស៊ីសាច់ ដែលអាស្រ័យនូវសរសៃ ក៏ទំពាស៊ីសរសៃ ដែលអាស្រ័យនូវឆ្អឹង ក៏ទំពាស៊ីឆ្អឹង ដែលអាស្រ័យនូវខួរក្នុងឆ្អឹង ក៏ទំពាស៊ីនូវខួរក្នុងឆ្អឹង ជាយន្តិ ជិយ្យន្តិ មិយ្យន្តិ ដង្កូវទាំងឡាយនោះ កើតក្នុងកាយ ចាស់ក្នុងកាយ ស្លាប់ក្នុងកាយ បន្ទោបង់នូវឧច្ចារបស្សាវៈក្នុងកាយ ។

កាយោ នេសំ សូតិឃរញ្ចេវ គិលានសាលា ច សុសានញ្ច វច្ចកុដិ ច បស្សាវទោណិកា ។

កាយនៃយើងទាំងនេះ ជាផ្ទះសម្រាប់ប្រសូតិនៃសត្វដង្កូវ ជាពេទ្យសម្រាប់ដាក់សត្វដង្កូវឈឺ ជាព្រៃសមសាន សម្រាប់បោលសាកអសុភដង្កូវ ជាបង្គន់ ជាស្នូកសម្រាប់ជុះ ឬជាសម្រាប់បន្ទោបង់នូវឧច្ចារបស្សាវៈនៃដង្កូវ គួរតែសង្វេគទៅនាកាយនៃយើងគេទាំងឡាយនេះ ដូចកាលដង្កូវកម្រើកជ្រួលជ្រើមឡើង ហើយក៏ដល់នូវសេចក្តីស្លាប់ ដោយដង្កូវកម្រើកនោះក៏មាន ខាងក្នុងកាយនេះ នឹងមានតែពួកដង្កូវបៀតបៀនតែម៉្យាងក៏ទេ សឹងមានរោគច្រើនជាងរយដំពូក បៀតបៀនក្នុងកាយនេះទៀត ហើយក៏ជាទីសាធារណៈទូទៅដល់សត្រូវទាំងឡាយខាងក្រៅ មានសត្វពស់ និងខ្លួយជាដើម ជាបច្ច័យនៃសេចក្តីស្លាប់ពងកាយនេះជាទីមុខ ត្រូវអំពីឧបទ្ទវន្តរាយទាំងពួងផ្សេងៗ ឧបមាដូចចន្ទោងដែលបុគ្គលខ្ទោងទុកក្នុងទីប្រជុំផ្លូវធំទាំង ៤ ជាទីត្រូវត្រង់នៃសរ និងលំពែងធំ និងដុំថ្មជាដើម

ហេតុនេះព្រះសម្មាសម្ពុទ្ធទ្រង់សម្តែងទុកថា ។

ឥធ ភិក្ខវេ ភិក្ខុ ទិវសេ និក្ខន្តេ រត្តិយា បតិហិតាយ

ឥតិ បដិសញ្ចិក្ខតិ ។

សេចក្តីថា ម្នាលភិក្ខុទាំងឡាយ ភិក្ខុដែលមានមរណសតិក្នុងសន្តាន កាលបើពេលាថ្ងៃប្រព្រឹត្តកន្លងទៅហើយ រាត្រីនឹងចូលមក គប្បីពិចារណាដល់មរណភាពនៃអាត្មាថា ហេតុដែលនឹងឲ្យអាត្មាដល់នូវសេចក្តីអន្តរាយ ជាបច្ច័យនៃសេចក្តីស្លាប់នោះច្រើនយ៉ាងណាស់ ដូចកាលពស់ចឹក ខ្ទួយទិច ក្អែបខាំក៏មាន ដូចកាលអាហារដែលបរិភោគចូលទៅហើយមិនទ្រុឌក្រោម ប្រមាត់កម្រើក ស្លេស្មកម្រើក ខ្យល់មានមុខដ៏មុតដូចកាំបិតចាប់ចុកក៏មាន ហេតុទាំងនេះក៏សុទ្ធតែសេចក្តីអន្តរាយ ជាបច្ច័យនៃមរណទាំងអស់ ឯវំ កាយពហុសាធារណតោ មរណំ អនុស្សរិតព្វំ ព្រះយោគាវចរគប្បីពិចារណានូវសេចក្តីស្លាប់ ដោយកាយពហុសាធារណ យ៉ាងនេះ ។

៤- អាយុទុព្វលតោ ឲ្យព្រះយោគាវចររលឹកសេចក្តីស្លាប់ដោយអាយុមានកម្លាំងថយ គឺឲ្យរលឹកឲ្យឃើញថា អាយុរបស់សត្វទាំងពួង រកកម្លាំងមិនមានជាទុព្វលភាពពេកណាស់ ដូចបទថា ៖

សត្តានំ ជីវិតំ អស្សាសបស្សាសូបនិពទ្ធំ ចេវ ឥរិយាបថូប

និពទ្ធំច សីតុណ្ហូបនិពទ្ធំច មហាភូតូបនិពទ្ធំច អាហារូបនិពទ្ធំច ។

សេចក្ដីថា ជីវិតនៃសត្វទាំងឡាយនេះ ជាប់ចំពោះដោយដង្ហើមចេញនិងដង្ហើមចូលផង ថាបើដង្ហើមចេញចូលនោះ មិនបានប្រព្រឹត្តទៅហើយ ជីវិតក៏នឹងដាច់ទៅសូន្យទៅនឹង ដល់នូវសេចក្ដីមរណភាពដោយពិត ជីវិតនេះជាប់ទៅដោយឥរិយាបថផង កាលបើឥរិយាបថទាំង ៤ ប្រព្រឹត្តទៅស្មើល្អ ជីវិតនោះក៏រស់នៅបានមិនរលត់ មិនសូន្យទៅ បើឥរិយាបថនោះប្រព្រឹត្តទៅមិនស្មើ គឺអង្គុយច្រើន ឬដេកច្រើន ឬឈរច្រើន ឬដើរច្រើនជ្រុលដោយឥរិយាបថណា ១ ហើយ ក៏ជាហេតុនឹងឲ្យអាយុនោះ តិចទៅ ជីវិតនេះជាប់ទៅដោយសេចក្ដីក្ដៅនិងត្រជាក់ផង កាលបើក្ដៅនិងត្រជាក់នោះតាំងនៅស្មើល្អ ជីវិតក៏រស់នៅប្រព្រឹត្តទៅបាន បើក្ដៅឬត្រជាក់នោះជ្រុលហួសប្រមាណហើយ អាយុក៏នឹងដាច់សូន្យទៅ ជីវិតនេះជាប់ទៅដោយមហាភូតរូប ៤ គឺធាតុទាំង ៤ កាលបើធាតុទាំង ៤ នោះប្រព្រឹត្តិទៅស្មើល្អ ជីវិតក៏ចម្រើននៅបាន បើធាតុទាំង៤ ធាតុណា ១ ប្រព្រឹត្តិទៅមិនស្មើកម្រើកហើយ អាយុនឹងដាច់សូន្យទៅ ទុកជាបុគ្គលបរិបូណ៌ដោយកម្លាំងច្រើនយ៉ាងណា ៗ ក្ដី តែធាតុណា ១ កម្រើកហើយ ក៏គង់នឹងមានកាយនោះ គ្រាំគ្រាជារោគផ្សេង ៗ មានអតិសាររោគ គឺរោគចុះឈាមជាដើម មានកាយនោះពុកស្អុយសៅហ្មង ក្ដៅក្រហាយ ក្រវល់ក្រវាយផ្លួរទៅសព្វាងកាយ ជួនកាលមានទឹកដាច់ឃ្លាតចេញពីគ្នា

កំដាច់ជីវិតិន្ទ្រិយសូន្យទៅ ជីវិតនេះជាប់ទៅដោយអាហារ កាលបើបាន អាហារបរិភោគចូលទៅ ជីវិតក៏ប្រព្រឹត្តទៅបាន ថាបើមិនបានបរិភោគអាហារហើយ ឬបរិភោគឲ្យច្រើនកើនលើសប្រមាណ ភ្លើងធាតុនឹងអាចកំដៅឲ្យទ្រុឌទ្រោមទៅមិនបាន ហើយអាយុក៏នឹងដាច់សូន្យទៅ អាស្រ័យហេតុនេះឯងទើបសម្តែងថា ជីវិតិន្ទ្រិយរបស់សត្វទាំងពួងនោះ ជាប់ទៅដោយអស្សាសបស្សាសផង ជាប់ទៅដោយសេចក្តីក្តៅ និង ត្រជាក់ផង ជាប់ទៅដោយមហាភូតរូបផង ជាប់ទៅដោយអាហារផង ឯវំអាយុទុព្វលតោ មរណំអនុស្សរិតព្វំ ព្រះយោគាវចរគប្បីរលឹកដល់សេចក្តីស្លាប់ ដោយអាយុទុព្វលដូចមានន័យដែលសម្តែងមកនេះ ។

៦ អនិមិត្តតោ ឲ្យព្រះយោគាវចររលឹកសេចក្តីស្លាប់ ដោយកំណត់គ្មានថា ៖

ជីវិតំ ព្យាធិ កាលោ ច ទេហនិក្ខេបនំ គតិ បញ្ចេតេ
ជីវលោកស្មឹ អនិមិត្តា ន នាយរេ ។

អធិប្បាយថា ហេតុដែលនឹងកំណត់មិនបានរបស់សត្វនោះមាន ៥ យ៉ាង គឺជីវិតកំណត់មិនបាន ១, សេចក្តីឈឺចាប់កំណត់មិនបាន ១, កាលវេលានឹងស្លាប់កំណត់មិនបាន ១. ទីដែលនឹងចោលកឡេវរសាកសពកំណត់មិនបាន១, ដំណើរដែលនឹងទៅកាន់គតខាងមុខទៀត កំណត់មិនបាន ១, រួមគ្នាត្រូវជា ៥ យ៉ាង អធិប្បាយថាសត្វទាំងឡាយនឹងកំណត់

ថា អញនឹងមានជីវិតប្រព្រឹត្តទៅបានដល់កាលត្រឹមនោះ ៗ បើមិនទាន់ដល់កាលត្រឹមនោះទេ អញនឹងមិនស្លាប់មុន លុះតែដល់កាលកំណត់នោះទើបស្លាប់ នឹងកំណត់យ៉ាងនេះមិនបាន កលល កាលេបិ សត្តា មរន្តិ សត្វទាំងឡាយដែលកើតឡើងក្នុងគភ៌មាតានោះ ទើបនឹងតាំងឡើងជាកលលរូបហើយវិនាសទៅក៏មាន ជាអព្វុទហើយក៏មាន ដូនកាលជាបេសិជាឃនហើយវិនាសទៅក៏មាន ដូនកាលបែកបញ្ចសាខាហើយវិនាសទៅក៏មាន ដូនកាលតាំងនៅបាន ១ ខែ ២ - ៣ - ៤ - ៥ - ១០ ខែ ហើយក៏វិនាសទៅក៏មាន សត្វដំពូកខ្លះ ស្លាប់ក្នុងកាលចេញចាកគភ៌មាតាក៏មាន សត្វខ្លះចេញចាកគភ៌មាតាហើយ តាំងនៅបាន ១ ថ្ងៃ ២ ថ្ងៃ ៣ ថ្ងៃ ហើយស្លាប់ទៅក៏មាន នៅបាន ៤-៥-១០ ថ្ងៃស្លាប់ទៅក៏មាន នៅបាន ១ ខែ ២ ខែ ៣ ខែ ហើយស្លាប់ទៅក៏មាន នៅបាន ៤-៥-១០ខែ ហើយស្លាប់ទៅក៏មាន នៅបាន ១-២-៣ ឆ្នាំ ហើយស្លាប់ទៅក៏មាន តាំងនៅបាន ១០-២០-៣០ ឆ្នាំ ហើយស្លាប់ទៅក៏មាន ដែលនឹងកំណត់ជីវិតនេះកំណត់មិនបាន ឯសេចក្តីឈឺចាប់នោះទៀតក៏កំណត់មិនបានដូចគ្នា ដូចបទថា ឥមិនា ព្យាធិនា សត្តា មរន្តិ ន អញ្ញេន ថាសត្វទាំងឡាយនឹងស្លាប់ដោយជម្ងឺនេះ ដោយរោគឈ្មោះនេះ ៗ យ៉ាងនេះកំណត់មិនបាន សត្វដំពូកខ្លះស្លាប់ដោយចក្ខុរោគគឺរោគក្នុងភ្នែក ឬសោតរោគ គឺរោគក្នុងត្រចៀក ដូនកាលស្លាប់ដោយឃានរោគ គឺរោគក្នុងច្រមុះ ឬជិវ្ហារោគ គឺរោគក្នុងអណ្តាត កាយរោគ គឺរោគក្នុងកាយ សីស

រោគ គឺរោគក្នុងក្បាលមានប្រការផ្សេង ៗ សត្វដំពូកខ្លះស្លាប់ដោយរោគដែលតាំងឡើងអំពីប្រមាត់ហៅថាបិតសមុដ្ឋានរោគ ខ្លះស្លាប់ដោយរោគដែលតាំងឡើងអំពីស្លេសហៅថាសេម្ហសមុដ្ឋានរោគយ៉ាងនេះ កាលវេលាដែលនឹងស្លាប់នោះទៀតក៏រកកំណត់មិនបានដូចគ្នា ដូចបទថា ន មស្មឹ យេវកាលេ មរិតព្វំ អញ្ញស្មឹ ថាសត្វយ៉ាងនេះត្រូវស្លាប់ក្នុងពេលដូច្នេះ ក្រៅពីពេលនេះមិនស្លាប់ឡើយ នឹងកំណត់ដូច្នេះមិនបាន ជួនកាលសត្វខ្លះស្លាប់ក្នុងពេលព្រឹកក៏មាន សត្វខ្លះស្លាប់ក្នុងវេលាថ្ងៃត្រង់ ខ្លះស្លាប់ក្នុងវេលាថ្ងៃរសៀលក៏មាន ជួនកាលស្លាប់ក្នុងពេលបឋមយាម ឬ មជ្ឈិមយាម ឬ បច្ឆិមយាមក៏មាន ដែលនឹងកំណត់វេលាស្លាប់នោះកំណត់មិនបាន ដូចន័យដែលពោលមកនេះជាដើម ៗ

(មានតទៅទៀត)



# អំពីដើមកំណើតប្រាសាទអង្គរ ( តពីខ្សែ ៤ )

លោកល្វីហ្វីណូត៍ អាចារ្យបង្រៀនឧត្តមវិជ្ជា សាលាកូឡែសដឺហ្វ្រង់ស្ស

នៅក្រុងប៉ារីសជាអ្នកអធិប្បាយ

ក្រុមការ ជុំ-ម៉ៅ

ធ្វើរាជការនៅព្រះរាជបណ្ណាល័យ ប្រែចេញជាភាសាខ្មែរ

(ចប់)

.បន្ទាយឆ្មារនៅជាខាងកើតបំផុតទីរួមខេត្តបាត់ដំបង នៅលើជើងភ្នំដងរែក គឺជាប្រាសាទ ១ ដែលបាក់បែកអន្តរាយជាងគេហើយប្រហែលជាទីក្រុងស្តេចដែលផុតត្រឹមប្រាសាទនេះ ម៉ោនសៀ គ្រោលីយេ ,បានពិនិត្យសព្វគ្រប់ទៅឃើញថា ប្រាសាទនេះប្រហែលពិតជារបស់ស្តេចជ័យវរ្ម័នទី ២ គឺប្រាសាទអម្រេន្ទ្របុរ ដែលសាងក្នុងសករាជ ៨០០ ក្នុងពាក់កណ្តាលឆ្នាំ ៩០០ នៃគ្រិស្តសករាជ ។

បើយើងពិនិត្យបន្ទាយឆ្មារអំពីខាងសាសនានោះនឹងស្គាល់បែបយ៉ាង១រំពេចនៅវេលាដែលក្រឡេកទៅចំ គឺដំបូលតាំងអស់នោះមានបន្ទុបកំពូលច្រេចនានៅខាងលើមុខពុទ្ធរូប ដែលទ្រង់គ្នែនក្នុងក្បាំង ដែលលាកខ្ទង់គ្រប់តែសសរតាំងអស់នោះ មានរចនាជារូបស្រីទេពអប្សរ និងពុទ្ធរូបគ្រប់កន្លែង គេបានឃើញនៅមេភ្លរខាងលើ រឿងការតាំងឡាយរបស់ព្រះពុទ្ធបានត្រាក់ចេញពីនគរទៅទ្រង់ផ្នួសឬគ្រង់គេគោរពព្រះពុទ្ធជាដើមនៅជញ្ជាំង

ខាងលិចប៉ែកខាងត្បូង នៅជញ្ជាំងថែវនោះ មានឆ្លាក់ជារូប ៨ កម្ពស់ប្រហែល ២ ម៉ែត្រ ជារូបលោកេស្វរៈច្រើនយ៉ាង ។

មានរូបពោធិសត្វដែលនេះមួយ និងព្រះពុទ្ធរូប ២ អង្គ គេបានរកឃើញក្នុងកន្លែងដែលបាក់បែក ។

ឃើញថារូបតាំងប៉ុន្មានដែលមានលើប្រាសាទនោះ ជារូបក្នុងព្រះពុទ្ធសាសនាទាំងអស់ លើកតែកន្លែងមួយចេញ គឺបន្ទប់ដែលមានក្រឡោងខ្វែង ៤ ជ្រុង នៅខាងមាត់ទ្វារចូលទៅកំពែងខាងក្នុង បន្ទប់នោះ មានខ្លោងទ្វារឆ្លាក់ជារឿងព្រះឥសូរសុទ្ធ មានរូប ព្រះសិវៈ ១, ព្រះព្រហ្ម ១, និងព្រះវិស្ណុ ១, អង្គុយសំពះ ឯខ្លោងទ្វារឯទៀតនោះប្រែបមិនប្រាកដ ប៉ុន្តែវិមាននេះដែលនៅក្នុងចំណោមប្រាសាទធំ ៗ នោះហាក់ដូចជាមានភាពជាគេមិនរាប់អាន ហើយនៅឆ្ងាយចំណែកដាច់ពីប្រាសាទឯទៀត ដែលជាប្រាសាទសម្រាប់ពុទ្ធសាសនា ។

ម្យ៉ាងវិញទៀតឯជញ្ជាំងថែវនោះ ក្រៅពីរូបលោកេស្វរទាំង ៨ គ្មានអ្វីជាសម្គាល់ខាងផ្លូវសាសនាឡើយ គឺមានតែរឿងចម្បាំងជាក្បួនទ័ព និងរឿងកិច្ចរបស់ស្តេច គេឃើញមានរឿងព្រាហ្មណ៍អង្គុយគោរពលិង្គ ១ ដែរ ប៉ុន្តែរឿងនេះគ្រាន់តែជាគុបតែងជាគំនូរប៉ុណ្ណោះទេ មិនមែនជាការសម្រាប់គោរពរបស់អ្នកសាង ក៏ទេដែរ ។

ក្នុងទីនេះយើងឃើញរូបព្រះដែលមានសល់នៅគង្គវធំ ម្យ៉ាងវិញទៀតយើងឃើញរូបតាំងឡាយ ដែលពួកអ្នកគោរពរូបនៅគង្គបានកាយចោល

គោសពោលនិងធ្វើឲ្យខុសកងចេញក្នុងក្រុងទាំងពីរនេះឃើញតែលោកកេ-ស្វរជាប្រធាន លោកកេស្វរ នេះគេឃើញលេចភាពហាក់ដូចជាទៅហ្វាយនៃទីក្រុងនោះ ៗ អម្រិន្ទ្របុរ និង យសោធរបុរ ជាទីក្រុងពីរមានភាពដូចគ្នា ហើយទីក្រុង ១ នៅមានសណ្ឋានជាទីក្រុងសម្រាប់ពុទ្ធសាសនា ឯទីក្រុង១ទៀតនោះបាត់អស់ខ្លះទៅ សេចក្តីដែលដូចគ្នានេះមានបញ្ជាក់ទៅដោយស្ថានផ្សេង ៗ ទៀត គឺនៅជញ្ជាំងខាងក្រោមកំពូលមុខបួននិងខឿនទ្រូបនាគ នៅខាងកើតទីក្រុងមានស្រះធំ ១ ពងបួនជ្រុងទ្រវែង ឯផែនទីក៏គ្មានសេចក្តីប្លែកជាលក្ខណ៍ គឺគ្រាន់តែប្លែកថា ក្រុងអង្គរធំនោះ មានទំហំផែនទីកបធំជាងបន្ទាយធ្លារ ២ ដង ហើយ ១ ទៀតឯសីមានៃអង្គរធំនៅក្នុងកំផែងជុំវិញ ឯសីមានៃបន្ទាយធ្លាវិញនោះនៅជាកណ្តាលកំផែងនិងដីទួល ដែលលើកសម្រាប់ការពារខាងក្រៅក្រុង ក្រៅពីសេចក្តីទាំងនេះអង្គរធំជាប្រាសាទមានភាពសុទ្ធនឹងបន្ទាយធ្លា ជាក្រុង ១ យ៉ាងធំ យ៉ាងត្រឹមត្រូវតាមក្បួនខាត ដែលបញ្ជាក់ដោយពិតអំពីអាណាចក្រដ៏ធំទូលាយរបស់ម្ចាស់ផែនដី ហើយដែលយើងហៅថារបៀបតាក់តែងក្រុងនិងរចនា ប៉ុន្តែបែបដែលកសាងទីក្រុង បែបដែលតុបតែងទីក្រុងមានភាពលំនាំមិនឆ្ងាយអំពីបែបភាពទីក្រុងជាន់មុន ៗ ឡើយ យើងសម្គាល់ឃើញសេចក្តីប្លែកបន្ទាប់បន្សំ ១ ទៀត តែមិននាំឲ្យប្រែប្រួលខូចយោបល់នេះទេ គឺថា

កោះបន្ទាយឆ្មារមានប្រាសាទតូច ១ សម្គាល់បានណាស់ឯអង្គរធំវិញនោះ គ្មានប្រាសាទតូចនេះឡើយ ប៉ុន្តែប្រាសាទតូចនេះឃើញមាននៅក្នុងប្រាសាទធំៗ ដិតទីនោះសាងក្នុងគ្រាជាមួយ បានជាខ្ញុំនិយាយក្នុងស្ថាននេះឲ្យឃើញជាពិស្តារបន្តិច ព្រោះការកសាងនេះជាគោល១ ដ៏ឧត្តមក្នុងពង្សាវតារ ហើយម្យ៉ាងទៀត ព្រោះខ្ញុំចង់តម្រូវសេចក្ដីយល់ឃើញជាថ្មីអំពីរឿងនេះ ។

ប្រាសាទតូចៗទាំងនេះមានបណ្ដោយពី ១២ ទៅ ១៨ ម៉ែត្រ សាងពីថ្មកក់ និងថ្មបាយក្រៀមក៏មានគម្រោស់ដូច ប្រាសាទទាំងនេះមាន ៣ ចំណែក ខាងកើតមានយ៉ នៅកណ្ដាលមានបន្ទប់វែង ១ ហើយខាងលិចមានកន្លែងសន្និបាត ១ មានកំពូលខ្ពស់ឡើងសម្រាប់លោកកេស្ស ដូចមានខ្លោងទ្វារជាសំកាងស្រាប់ ៗ បន្ទប់វែងនោះមានពិតាន ១ សម្គាល់ឃើញពីខាងក្រៅ មានដំបូលកណ្ដាល ១ និងថែវសងខាង ២ ហើយខាងក្នុងគេសម្គាល់ឃើញមានស្នាមខ្ពស់ទាប ហាក់ដូចជាគេបានបំបាក់សសរ ២ ជួរពោល ហើយរំលប់ជ្រុងចេញ គួរតែសម្គាល់ថា លើកតែត្រង់ព្រះបាទពិជួរចេញ នោះបន្ទប់នេះទទួលពន្លឺតែពីទិសខាងត្បូង ឯជញ្ជាំងខាងកើតនោះងងឹតសូន្យ គ្រាន់តែមានធ្វើបែបជាបង្អួចបញ្ឆោតប៉ុណ្ណោះ ។

សព្វថ្ងៃនេះ គេបានរកឃើញប្រាសាទធំៗ ១៥ យ៉ាងនេះ គឺប្រាសាទព្រះខ័នទាំងពីរ តាព្រហ្ម, បេងមាលា និង បន្ទាយឆ្មា ឯប្រាសាទ

ឯទៀតនោះ រៀបគ្នាតាមបណ្ដោយតាមផ្លូវធំ ២ នៃស្រុកខ្មែរចាស់ គឺជាផ្លូវដែលចេញពីអង្គរធំទាំង ២ ហើយ ១ ឆ្ពោះទៅខាងកើតគឺចំពោះព្រះខ័ន ១ ទៀតឆ្ពោះទៅទិសពាយព្យនោះចំពោះភីម៉ៃ ។

តាមធម្មតាប្រាសាទទាំងនេះឆ្ងាយពីគ្នា ពី ១៥ ទៅ ២០ គីឡូម៉ែត្រ ហើយនៅទៀងតែពីខាងជើងផ្លូវ គឺឲ្យយល់បានថា ប្រាសាទទាំងនេះទទួលពន្លឺតែពីទិសខាងត្បូង ហេតុនេះឲ្យយល់ឃើញថា ប្រាសាទទាំងនេះគេសាងតាមលំនាំផ្លូវ ទុកសម្រាប់អ្នកដំណើរ ។ បើគេពិចារណាឃើញថាប្រាសាទទាំងនេះសាងសម្រាប់លោកេស្វរ ហើយពោធិសត្វនេះ ដូចកាលមាននាមថា លោកេស្វរនៃមន្ទីរឱសថ គឺអរោគ្យសាលា នោះគេនឹងយល់ថា ប្រាសាទដែលសាងរៀបរៀងជាលំដាប់តាមផ្លូវនោះ ជាមន្ទីរព្យាបាលរោគ គឺអរោគសាលា សម្រាប់អ្នកដំណើរដែលឆ្ពោះទៅកាន់វិហារដ៏ប្រសើរ ប្រហែលជាទៅកាន់ប្រាសាទនៃលោកដ៏មានឥទ្ធិឫទ្ធិដែលកំចាត់បង់នូវទុក្ខបាន បើប្រសិនជាប្រាសាទទាំងនោះ គេសាងសម្រាប់ឧបត្ថម្ភមនុស្សដើម្បីមែននោះ គេគ្មានសង្ស័យអ្វីឡើយ ដែលឃើញប្រាសាទទាំងនេះនៅក្នុងកំផែងក្រៅឆ្ងាយអំពីទីប្រជុំ ដើម្បីកុំឲ្យសៅហ្មងដល់សេចក្ដីបរិសុទ្ធ ។

ដោយជាការពិបាកនឹងរិះរកសេចក្ដីនឹងអធិប្បាយឲ្យចំប្រាកដ ហើយ

ដោយប្រាសាទនោះមានឈ្មោះផ្សេង ៗ ដូចជាប្រាសាទ ទ័ពជ័យ ដែលគេតែងតែកំណត់នាមដូច្នេះ នោះនាមនោះ ហាក់ដូចជាមិនមែនជាឈ្មោះពិតប្រាកដរបស់ប្រាសាទនេះឡើយ ហេតុដូច្នេះ យើងត្រូវតែតាំងនាមដោយសន្មត កំណត់ហៅថា អរោគ្យសាលាវិញ លើកលែងតែក្នុងស្ថានដែលអ្នកឯណា ១ បានរកកស្តុតាងឃើញពិតប្រាកដ អំពីឈ្មោះនៃប្រាសាទតាំងនេះ ដូច្នេះឃើញថាបន្ទាយឆ្មារនោះ មានអរោគ្យសាលា ១ ឯអគ្គរធំនោះគ្មានឡើយ ព្រោះថាប្រាសាទដែលនៅឃ្លាតដាច់ពីគេនេះមិនជាសម្រាប់ត្រូវការដល់ទីក្រុងធំទេ ប៉ុន្តែគេឃើញមានអរោគ្យសាលានេះក្នុងប្រាសាទផ្សេង ៗ ជិតទីនោះ គឺនៅប្រាសាទតាព្រហ្ម ប្រាសាទព្រះខ័ន និងក្នុងប្រាសាទមួយទៀត នៅដាច់ពីគេទៅក្នុងព្រៃជាខាងជើងក្រុង គឺប្រាសាទផ្លូ តាមដែលបានពិនិត្យឃើញគេនឹងសម្គាល់បានថាប្រាសាទបន្ទាប់បន្សំនេះ កើតក្នុងជាន់ដែលយើងហៅថា ជាន់រចនាប្រាសាទបាយ័ន ហើយប្រាសាទនេះគេនឹងត្រូវការពិនិត្យជាក្រោយ នៅវេលាដែលគេបានច្បាស់ នូវរឿងរ៉ាវអំពីប្រាសាទដែលសាងក្រោយ ៗ ដូចជាប្រាសាទព្រះខ័នខាងកើត និងបេងមាលា ។

វេលានេះយើងត្រឡប់ទៅសេចក្តីខាងដើមវិញ គឺអំពីសាងអគ្គរធំ ខ្ញុំស្មានថាបានពោលខាងដើមហើយ ថាអគ្គរធំនោះ កាលដើមជាទីក្រុង

សម្រាប់ពុទ្ធសាសនា  នៅក្នុងសេចក្ដីទំនុកបម្រុង នៃលោកេស្វរដូចជា បន្ទាយឆ្មារដែរ  ប៉ុន្តែប្រហែលជាស្ដេច ១ អង្គកាន់ពុទ្ធសាសនាបានសាង ឯស្ដេចនោះប្រហែលជាមិនមែនយសោវរ្ម័ន  ដែលកាន់សាសនាព្រះឥសូរ នោះឡើយ  សេចក្ដីសន្និដ្ឋាននេះខ្ញុំមិនក្រែងទេ  ច្បាស់ជាខុសជាខ្លាំង អំពីចារឹកនៅស្ដុកកក់ធំ  តែយើងត្រូវពិនិត្យមើលឲ្យប្រាកដ ។

ចារឹកនេះធ្វើក្នុងសកករាជ ៩៧៤  គឺក្នុងគ្រិស្ដសកករាជ ១០៥២ កំណត់ ១០៩ ឆ្នាំ  មុនឆ្នាំដែលយសោវរ្ម័នទិវង្គត  ចារឹកនេះមិនមែនធ្វើ សម្រាប់ចុះសេចក្ដីអ្វី ៗ ក្នុងជាន់នោះទាំងអស់ឡើយ  ឯសេចក្ដីក្នុងនោះគឺ ស្រង់យកតាមគោលដើមមក  ឯគោលនោះគឺជាបែបពង្សាវតារ  ដែល គេកត់ត្រារៀង ៗ មកចំនួន ២៥០ ឆ្នាំ  ប៉ុន្តែត្រូវបញ្ចូលក្នុងនេះគំនិតនិង ប្រយោជន៍របស់បុរោហិតដែលបានតែងសេចក្ដីនោះ  ក្នុងសំអាងយើង នោះថា នៅបន្ទាយបាយ័ន  គេយកព្រះឥសូរជំនួសព្រះពុទ្ធ  មិនត្រូវឆ្ងល់ ឡើយពីក្រុមហោតា  គឺក្រុមសង្ឃការីដែលយល់ឃើញថាជាការអាប់ឱន ណាស់  ដែលយកព្រះខ្លួនទៅតម្កល់ក្នុងទីដែលគេសាងសម្រាប់ព្រះឯទៀត ក្នុងស្រុកខ្មែរពីដើម សេចក្ដីនេះឃើញជាការប្លែកពីការអ្វី ៗ ទាំងអស់ ព្រោះ គេមិនដែលកសាងបដិមាករឯណាមួយទៅតម្កល់ក្នុងប្រាសាទដែលគេបោះ បង់ឡើយ  តែត្រង់នេះស្ថានដែលបង្កើតឲ្យមានឡើង ដោយហេតុតែមាន

ប្រាសាទស្តេចនៅកណ្តាលនគរ តែជាដែលបង្កើតមានយ៉ាងដូច្នេះក៏មិនគួរដែរ រួចគេឃើញថាអយ្យកោរបស់សាសិវចូលចិត្តបំបិទបំបាំងសេចក្តីដែលមិនល្អនេះឲ្យស្ងាត់ស្ងៀមទៅ យើងបន្ថែមថាឯប្រាសាទនោះ គេបានសង់ទៅសាសនាដើមវិញ ក្នុងរជ្ជស្តេចកាន់ពុទ្ធសាសនាដែលគ្រងរាជ្យជាន់ក្រោយ ឯសេចក្តីអួតអាងរបស់ស្តេចយសោវរ្ម័ន សេចក្តីមានៈនិងគំនិតរបស់បុរោហិតនៃស្តេចនេះ ព្រមព្រៀងជាមួយគ្នា ហើយតាំងខ្លួនថាជាអ្នកដែលបានកសាងអង្គរធំនិងប្រាសាទបាយ័ន ប៉ុន្តែមានការ ១ នាំឲ្យទើសទែងទៅលើសេចក្តីនេះទៀត គឺអំពីរឿងកំរព្រះពុទ្ធដែលជាលំអទីក្រុងនោះ នៅលើកំពូលដំបូលនោះបានរៀបរៀងនូវពុទ្ធរូបទ្រង់ក្អួនជាជួរក្នុងក្បាំងដែលលកខ្វង់ តែរូបទាំងនោះគេរំលើងចោលអស់ នៅជញ្ជាំងនិងនៅសសរបាយ័ននោះដេរដាស ទៅដោយរូបព្រះពុទ្ធជាច្រើន ហើយរូបទាំងនោះគេគស់ចោលចេញគេរំលើងចេញ ឬ ក្លាយកង់ឲ្យទៅជាបែបតាបសមានពុកមាត់ ពុកចង្កាទៅវិញ ឬ ឆ្លាប់ធ្វើទៅជាលិង្គ ឬ ឆ្លាក់ជាបាច់ផ្កាតែមិនឃើញមានជាបំពាបំពានដល់ទីអន្តរាយនោះទេ ដែលគេធ្វើនោះគឺធ្វើដោយពិនិត្យពិច័យដោយសេចក្តីព្យាយាមអត់ធ្មត់ត្រឹមត្រូវតាមទំនៀមទម្លាប់អ្នកស្រុក ការនោះប្រហែលជាធ្វើតាមបង្គាប់សេនាបតីម្នាក់ដែលបានចាត់ក្រសួងគមនាគារ ដោយយកប្រាក់ឃ្លាំងទៅចំណាយ គ្រានោះ

គួរឲ្យឃើញថ្វែកដែលគេមិនបានបំបាត់រូបលោកេស្វរចេញ ព្រោះពោធិ-សត្វនេះមានដៃជើងនិងក្បាលច្រើន ដូចជាព្រះនារាយណ៍ឬព្រះឥសូរដែរ ហើយគេទុករូបទាំងនេះជំនួសព្រះឥសូរ និងព្រះនារាយណ៍នេះបានដោយងាយ ឯប្រាសាទខ្លះនៅអង្គរដែលមានពុទ្ធរូបជាច្រើនដែលលុបចេញមិនអស់នោះ ធ្វើឲ្យយើងឃើញជារឿងព្រះពុទ្ធសាក្យមុនី មានរឿងចេញពីនគរទៅទ្រង់ផ្នួស ឬត្រង់ដែលកាត់ព្រះកេសា រូបទាំងនេះ វេលាដែលឃើញគេអាចនឹងវិនិច្ឆ័យយល់សេចក្តីអំពីពួកព្រាហ្មណ៍បានដោយងាយ ។

បើដូច្នេះឃើញថា យសោវរ្ម័ននេះមិនមែនជាអ្នកសាងអង្គរធំ និងបាយ័នឡើយ ថ្វីបើឃើញមានសេចក្តីអំនួត និងពាក្យរបស់ស្តេចនេះនិយាយបញ្ជាក់ ក្រៅពីសំអាងខាងផ្លូវសាសនានោះ យើងមានសំអាងយ៉ាងត្រឹមត្រូវដោយពិតនោះ ១ ទៀត គឺថា យើងមានប្រាសាទ ១ ដែលសាងក្នុងរាជ្យស្តេចយសោវរ្ម័ន គឺប្រាសាទភ្នំបាខែងដែលហៅថា យសោ-ធរេស្វរ បើមាននរណា ១ យកប្រាសាទនេះទៅផ្ទឹមគ្នានឹងប្រាសាទបាយ័ននោះ អ្នកនោះនឹងបានសេចក្តីច្បាស់ក្លាមថា មិនមែនជាថ្វីដៃម្ចាស់ផែនដីជាមួយគ្នាឡើយ ។

សព្វនេះមិនមែនធ្វើក្រាប់ឲ្យដូចទេ គ្រាន់តែជាការជួយណែអ្នកប្រែពាក្យនោះ ចេញពីថ្ម ៖

# សព្វ

មនព្រះបាទ បរមេស្វរ មកអាជ្ញា បំក្រុងទិនៅនគរផ្ទែបុរស្តែង អញ សិរីកៅល្យ ត គឺប្រាជ្ញគរុជាបរោហិត តព្រះបាទបរមេស្វរ មនព្រះបាទថ្វើងមកអាវផ្ទែបុរ មនព្រះបាទបរមេស្វរក្រុងទីអស្ស នគរហរិហរ-លយ មនព្រះបាទបរមេស្វរ ទៅក្រុងទីអស្សមហេន្ទ្របវ្វត មានព្រាហ្មណដ្ឋះ ហិរណ្យទាមប្រាជ្ញសិទ្ធិវិទ្យា មកអាវិជនបទ បំព្រះបាទបរមេស្វរ អញ្ចេញធ្វើវិធីលេហ លេងកំបីកម្មជនេស នេះអាយត្ត តជាលើ លេងអាចត កម្រតេងផ្ទែក្រោម ម្ស្យគុះតជា បក្រវត្តិ ព្រាហ្មណនោះធ្វើវិធីដោយព្រះវិនាសិខប្រតិស្ឋាកម្រតេង ជគតតកជ ព្រាហ្មណនោះបង្រៀនព្រះវិនាសិខ ទយោត្តរ សម្មោហ សិរស្ឆេទ ស្យងមនស្វតមុខ បុញ្ញបំ-សរសិរ បំបង្រៀនស្តេងអញ សិរីកៅល្យនុតិ ប្រើស្តេងអញ សិរីកៅល្យ គិតធ្វើវិធិនាកម្រតេងជគតតកជ មនព្រះបាទបរមេស្វរ ស្តុបរិងមកក្រុងទិអាយនគរហរិហរលយ ព្រះកម្រតេងអញតកជតិនាមមកឧកព្រះបាទបរ-មេស្វរ ស្ថិតនៅនគរ ហរិហរលយ ។

បើថា យះសាវ្ម័ន មិនមែនជាអ្នកកសាងអង្គរធំ និងបាយ័នទេ នោះយើងត្រូវកត់ប្រអ្នកដែលកសាងនេះឲ្យឃើញ ដោយកប់រឿងតាមដួរក្រសែស្តេចដែលគ្រងរាជ្យមុនៗ ។

ឥន្ទ្រវរ្ម័នជាបិតាស្តេចនេះ យើងមិនត្រូវយកមកនិយាយឡើយ ដោយ

ក្សត្រិយ៍នេះកាន់សាសនាព្រះឥសូរយ៉ាងមាំមួនណាស់ ហើយប្រាសាទទាំងប៉ុន្មានដែលបានសាងនោះ សម្រាប់តែព្រះឥសូរទាំងអស់ ម្យ៉ាងវិញទៀតឥន្ទ្រវរ្ម័ននេះ ជាវង្សក្សត្រិយ៍ថ្មីមិនជាប់ទៅក្នុងវង្សមុនឡើយ ។

វង្សក្រោយនេះមានតែស្តេចពីរព្រះអង្គ នាមជ័យវរ្ម័នទី ២ បរមេស្វរ (សករាជ ៧២៤ ទៅ ៧៩១) ត្រូវនឹងគ្រិស្តសករាជ ៨០២ ដល់ ៨៦៩ និងជ័យវរ្ម័នទី ៣ វិស្ណុលោកពីសករាជ ៧៩១ ទៅដល់ ៧៩៩ ត្រូវនឹងគ្រិស្តសករាជ ៨៦៩ ដល់ ៨៧៧ ស្តេចនេះកាន់សាសនាព្រះនារាយណ៍ (វិស្ណុ) ដូចមានព្រះនាមជាសម្គាល់ស្រាប់ ។

ជ័យវរ្ម័នទី ៣ គ្រងរាជ្យបានតិចណាស់ ទើបសម្គាល់ថាជាអ្នកសាងអង្គរមិនបាន ។

រឿងក៏ប្រែផ្សេងទៅវិញកាលណា យើងកប់ឡើងដល់ជ័យវរ្ម័នទី ២ បរមេស្វរ គឺថាត្រង់នេះយើងបានដឹងថា មានស្តេច ១ អង្គដែលមានឫទ្ធិ ហើយជាអ្នកសាងទីក្រុងជាច្រើនផង ។

ចារឹកនៅស្តុកកក់ធំដែលពណ៌នាពីស្តេចនេះ ដូចមានខាងក្រោយ ព្រះបាទបរមេស្វរយាងមកពីក្រុងជ្វា ដើម្បីគ្រងរាជ្យក្នុងឥន្ទ្របុរៈ ក្នុងវេលានោះមានគ្រូ សិវកៃវល្យជារាជបុរោហិត តពីនោះមក ព្រះបាទបរមេស្វរយាងទៅឯឥន្ទ្របុរៈ ហើយព្រះអង្គគង់នៅក្នុងហរិហរាលយ ទើបព្រះអង្គយាងទៅតាំងក្រុងអមរេន្ទ្របុរៈ ហើយទៅគង់នៅមហេន្ទ្របវ៌ត ក្នុងវេលា

នោះមានព្រាហ្មណ៍ ១ ឈ្មោះហិរណយទាម ជាអ្នកប្រាជ្ញក្នុងសិល្បវិទ្យា មកពីស្រុកជនបទ ព្រោះព្រះអង្គឲ្យទៅអញ្ជើញមកធ្វើពិធីដើម្បីកុំឲ្យក្រុងកម្ពុជា ជាចំណុះស្រុកជ្វា ហើយឲ្យមានក្នុងនគរនេះស្តេចចក្រពត្តិ ១ ព្រះអង្គ ព្រាហ្មណ៍នេះបានរៀបពិធីតាមដោយព្រះវិនាសិខ ហើយប្រតិស្ឋានស្តេចទេវរាជ (កម្រតេងជគតតរាជ) ព្រាហ្មណ៍នេះបានបង្រៀន ព្រះវិនាសិខ នយោត្តរ សម្មោហ សិរច្ឆេទ ព្រាហ្មណ៍បានសូត្រតាំងពីដើមលុះចប់ ដើម្បីសរសេរ ហើយបង្រៀនដល់ស្តេងអញ សិវកៃវល្យ បានបង្គាប់ដល់សិវកៃវល្យ ឲ្យធ្វើពិធីនៃទេវរាជ វេលានោះព្រះបាទបរមេស្វរត្រឡប់ទៅគង់ក្រុងហរិហរាលយវិញ ហើយបាននាំទេវរាជទៅទុកក្នុងទីនោះផង ព្រះបាទបរមេស្វរទិវង្គតក្នុងហរិហរាលយ ។

ឯពង្សាវតាររបស់ស្តេចនេះ គេសរសេរគ្មានផ្ចិតផ្ចង់ឡើយ ប៉ុន្តែអាចនឹងដកយកសេចក្តីដែលមានប្រយោជន៍បានគឺជ័យវរ្ម័ននិយាយក្នុងចារឹកថាព្រះអង្គយាងមកពីស្រុកជ្វា ឈ្មោះស្រុកនេះមិនច្បាស់សោះ (សព្វថ្ងៃខ្មែរទាំងឡាយហៅឈ្មោះនេះ ដល់ប្រជុំស្រុកមាលយូ) ជ័យវរ្ម័នបាននិយាយពីមហានគរ ស្រីវិជ័យកាលក្នុងឆ្នាំ ៨០០ ទៅ ៩០០ អំពីដែលនគរនេះផ្សាយព្រះរាជអាណាខែត្រទៅលើតំបន់ខាងត្បូង បើមិនមែនផ្សាយទូទៅលើតំបន់កោះជ្វាទាំងមូល ហើយថាក្នុងឆ្នាំនោះស្តេចស្រុកមាលាយូមកវាយស្រុកខ្មែរមានជ័យទៀត ដូចមានរឿងក៏របស់ អាប៊ុ-សាអ៊ីដហា-

សាន់នៅសិកហ្វ៍ និយាយថាស្ដេចខ្មែរម្នាក់មកពីតំបន់បានផន ហើយប្រហែលជាម្ចាស់ផែនដីស្រុកនោះជួយផង ដើម្បីមកដណ្ដើមយករាជ្យនគរខ្មែរ ប៉ុន្តែគ្មានសេចក្ដីអ្វីជាពិតសោះ ឯនគរនេះកាន់ពុទ្ធសាសនាតាំងអស់ ហើយជឿគោរពលោកស្ទួរ បើដូច្នោះហើយ យើងមានសំអាងជាច្រើនដែលនឹងពន្យល់រឿងរ៉ាវអង្គរធំបាន យើងត្រូវពិនិត្យតាមរឿងរ៉ាវស្ដេចដែលមកវាយយកស្រុកខ្មែរ ។

ស្ដេចនេះបានមកលុកលុយស្រុកខ្មែរ ហើយវាយដណ្ដើមយកបានក្រុងឥន្ទ្របុរ រួចពីនោះស្ដេចឡើងពីឥន្ទ្របុរទៅឯហរិហរាល័យ តពីនោះទៀត ទ្រង់ស្ដេចទៅតាំងក្រុង អមរេន្ទ្របុរ គឺបន្ទាយឆ្មារ សាងលើមហេន្ទ្របវ៌ត គឺភ្នំគូលែន ហើយត្រឡប់មកឯ ហរិហរាល័យ វិញក៏ចូលទិវង្គតទៅ យើងនឹងបន្ថែមថា នៅវេលាដែលសាងអង្គរធំហើយនោះ យើងមិនដឹងជាគេឲ្យឈ្មោះអ្វីសោះ សពាសិរមិនបានដាក់ឈ្មោះឲ្យយើងដឹង ព្រោះសពាសិរនេះចង់ឲ្យគេថាការកសាងនេះ ជាសំណាស្នាដៃរបស់យសោវរ្ម័នវិញ ដូច្នេះឃើញច្បាស់ប្រាកដថា ប្រាសាទតាំងប៉ុន្មានដែលជ័យវរ្ម័ន ២ បានសាងនោះ សុទ្ធតែជាប្រាសាទសម្រាប់ពុទ្ធសាសនាតាំងអស់ទី ហើយឧទ្ទិសថ្វាយដល់លោកស្ទួរ ។ ចារឹកនៅស្ដុកកក់ធំនិយាយថាស្ដេចនេះបានឲ្យព្រាហ្មណ៍ម្នាក់មកពីស្រុកមិនបានកំណត់ឈ្មោះ ហៅថាជនបទមកបង្រៀនបុរោហិតស្ដេចនេះ អំពីវិជ្ជាតាំងឡាយផ្សេង ៗ ហើយបង្កើត

នូវការគោរពដល់ទេវរាជ ដើម្បីកុំឲ្យស្រុកខ្មែរចុះចូលស្រុកជ្វាទៀត ហើយឲ្យស្រុកខ្មែរនេះ មានស្ដេចចក្រពត្រាធិរាជ ១ ។

រឿងនេះឃើញជាប្លែកតែឯង ប៉ុន្តែបើទុកជាប្លែកដូច្នេះ ក៏គង់តែចូលជាពង្សាវតារដែរ គេនឹងមិនយកក្បួនដែលមានពាក្យឈ្មោះនេះជាប្រ-យោជន៍ក៏បាន ក្បួននេះចារឹកជាអក្សរតេគ្រ ដែលគេមិនស្គាល់សោះនៅក្នុងស្រុកឥណ្ឌា ហើយដែលមានចំណងជើងប្លែក ៗ គឺវិនាសិខៈ នយោត្តរ សម្មោហ សិរច្ឆេទ នោះឃើញថាក្បួនទាំងនេះ មានលាយធមិអាចិខ្លះ មន្តអាគមខ្លះ ហើយកើតមានជាច្រើនក្នុងសាសនាដែលកោយរៀវទៅ ការដែលជាធំនោះ គឺដែលបានប្រតិបត្តិគោរពនូវលិង្គ ដើម្បីឲ្យបាននគរខ្មែរជាឯករាជ្យ ឯនាមចក្រពត្រានោះ ជាកម្ពុណាស់ គឺជាអ្នកម្ចាស់ផែនដីដែលមានក្សត្រជាច្រើននៅក្នុងអំណាច ហើយម្ចាស់ផែនដីនោះ គ្មានលុះអំ-ណាចផែនដីណាមួយសោះ ។

វេលាដែលយសោវម៌្មទី ២ ឡើងគ្រងរាជ្យនោះ ព្រះអង្គនៅក្នុងអំណាចផែនដីជ្វា ( អាយត្ត ) គឺថាជាក្សត្របណ្ដុះមហារាជនៅស្រីវិជ័យដោយជាចំណុះតាំងពីដើមមក ហើយមកគង់នៅក្នុងស្រុកខ្មែរជាក្រោយប្ដូដោយព្រោះតែស្រុកខ្មែរចង់នឹងចាញ់មហារាជដែលពោលហើយនេះ ដូចជាអាប៊ុសារីដបាននិទានទុក ស្ដេចនេះមានប្រាថ្នានឹងផ្ដាច់ចំណងដែលចងទុករគេចេញ ប៉ុន្តែចុះហេតុដូចម្ដេច បានជាការដែលគ្រាន់តែគោរព

ព្រះ ១ ថ្មី នោះ អាចនឹងនាំឲ្យស្ដេចនេះ សម្រេចតាមគំនិតបាន? យើងស្មានថា សេចក្ដីនេះនឹងពន្យល់បាន ព្រោះនេះដែលជាលិង្គ ១ ឈ្មោះថា កម្រតេងជគតតរាជ នោះមិនមែនប្រាកដជាឈ្មោះដែលមាននិយាយក្នុងចារឹកនៅស្ដុកកក់ធំនោះទេ ឯចារឹកធ្វើឲ្យយើងដឹងថាព្រះនោះ ទំនុកបម្រុងនូវអំណាចម្ចាស់ផែនដី តៗ គ្នា (គិតតាំពរាជ្យកម្រតេងផ្ទៃក្រោមប្រទានមក)ៗ

គេនឹងយកលិង្គនេះធៀបនឹងលិង្គភទ្រេស្វរនៅស្រុកមីសឺន ដែលព្រះឥសូរឲ្យមកស្ដេច ដែលគ្រងរាជ្យជាដំបូងនៅស្រុកចម្ប៉ាបាន ដែលគេទុកជា ខ្លឹមនៃរាជានុភាពរបស់រាជវង្ស ១ គ្នា ( សន្តតិរាជ្យហោភទ្រេស្វរ ) ឯស្ដេចដែលគោរពដល់លិង្គនេះ នោះបានទទួលនាមផ្ទាល់ពីស្ថានសួគ៌មក មិនមែនទទួលពីស្ដេចឯណា ១ ឡើយ គឺបានជាស្ដេចចក្រវត្តិដោយអំណាចទិព្វ ដោយហេតុនេះហើយបានជាជ័យវរ្ម័នទី ២ ដែលចង់តាំងខ្លួនជាឯករាជ បានសាងរូបទេវរាជនេះ ក្នុងនគរព្រះអង្គ ៗ

តើក្នុងស្ថាននេះ យើងត្រូវជឿថា ស្ដេចនេះបោះបង់ពុទ្ធសាសនាចោលទៅកាន់សាសនាព្រះឥសូរវិញឬអ្វី ត្រង់នេះដូចជាគ្មានប្រយោជន៍ប៉ុន្មានទេ ព្រោះគេអាចនឹងទុកសាសនាចាស់ សម្រាប់គោរពបានផង ហើយទៅបូជាព្រះថ្មីបានឥតខាតអ្វីផង ៗ

ស្ដេចស្រុកខ្មែរទាំងឡាយ តាមធម្មតា ច្រើនតែមានអធ្យាស្រ័យ ហើយមិនគិតថា ខុសអំពីសេចក្ដីដែលគោរពប្រតិបត្តិ ដល់ព្រះឥសូរជា

មួយនឹងព្រះពុទ្ធ ។

ម្យ៉ាងវិញទៀត ពួកអាចារ្យ ដែលនៅក្នុងបក្សស្ដេច ក៏មានបញ្ញា ចេះប្រមូលសេចក្ដីជឿមិនឲ្យទាស់ទែងគ្នាបាន ឯព្រះរាជបុត្រជ័យវរ្ម័នទី ២ នោះក៏គោរពផលទេវរាជដែលជាសាសនាព្រះឥសូរដែរ ពិតមែនតែទ្រង់កាន់សាសនាព្រះនារាយណ៍ ។

សេចក្ដីសន្និដ្ឋានទាំងប៉ុន្មានដែលពោលមកនេះ នាំយើងមកដាក់នៅមុខសេចក្ដីដែលគេស្មានថាលំពិតបានហើយ ។ ត្រូវតែយកមកសើរើវិញក្នុងវេលានេះ ។ ក្នុងប្រាសាទខ្លះដែលស្ដេចជ័យវរ្ម័នបានសាងនោះ គេឃើញមានកំពូលមុខ ៤ ជាច្រើន យើងបានពន្យល់មុននេះបន្ដិចពីកំពូលទាំងនេះ ថាគេបានធ្វើប្រែកែទៅជាលិង្គមុខ ៤ វិញ ហើយសេចក្ដីពន្យល់នេះក៏បានយល់ព្រមព្រៀងគ្នាមក ។

សេចក្ដីពន្យល់នេះ បានយល់ព្រមថា ទាំងបន្ទាយឆ្មារ ទាំងបន្ទាយព្រះខ័ន និងប្រាសាទឯទៀតផ្សេងៗ ដែលមានសណ្ឋានប្រហែលគ្នានោះ ជាថ្វីដៃរបស់យសោវរ្ម័ន ដែលជាស្ដេចកាន់សាសនាព្រះឥសូរ ហើយគោរពប្រតិបត្តិដល់លិង្គនោះ ប៉ុន្តែសេចក្ដីពន្យល់នេះឃើញមិនពិតជាច្រើន ប្រសិនបើប្រាសាទទាំងនេះជាការថ្វីដៃរបស់ស្ដេច ១ អង្គ ដែលកាន់ពុទ្ធសាសនាវិញ ។

តើខុសគ្នាយ៉ាងណាទៅ ប្រសិនបើជាថារូបមុខ ៤ នោះជារូបរបស់លោកេស្វរៈវិញ ដោយហេតុថារូបដែលមានមុខច្រើនយ៉ាងនេះមិនសូវក្រ

ប៉ុន្មានទេ ពិតមែនតែគំរូមុខនេះមិនជាឃើញញឹកញយ តែថាក្នុងស្ថាននេះ យើងគួរបញ្ចូលទៅជាទំនងការអលង្ការវិញ ម្យ៉ាងវិញទៀតគួរយល់ថាមុខ ៤ នេះ ជាមុខដែលបែរក្រឡេកទៅគ្រប់ទិសទាំងអស់ភ្លាម ៗ ដើម្បីឲ្យពារសត្វសាធុការ ជាជាងដែលយល់ថាជាក្បាលដែលមានមុខ ៤ នោះវិញ បានជាថាដូច្នេះ ព្រោះជាមុខដែលមាននៅប្រាសាទបន្ទាយឆ្មារនោះឃើញមានមុខផ្សេង ៗ មកជ្រៀតនៅជាកណ្តាលនៃមុខ ៤ នោះទៀត ហើយដូចជាមុខដែលមាននៅប្រាសាទស្ទឹង ជិតប្រាសាទព្រះខ័ន ខាងកើតនោះក៏ឃើញមានទំនងអលង្ការភ្ញីមកជ្រៀតនៅចន្លោះមុខ ៤ នោះដែរ ក្នុងស្ថានទាំងនេះហាក់ដូចជាគេចង់ឲ្យឃើញតែមុខ ១ ដាច់ពីគេកុំឲ្យជាប់នឹងក្បាច់អលង្ការឯទៀត ឯសេចក្តីយល់ឃើញរបស់ខ្ញុំថា អង្គរធំនិងប្រាសាទកណ្តាលគឺប្រាសាទបាយ័ននោះ ស្តេចជ័យវរ្ម័នទី ៧ បរមេស្វរបានសាងក្នុងឆ្នាំ ៨៤០ គឺ ៩០ ឆ្នាំ មុនឆ្នាំដែលគេធ្លាប់ជឿមក ប្រាសាទបាយ័នកាលដើមថ្វាយដល់ពុទ្ធសាសនា ហើយតមកស្តេចដែលនេះ បានដាក់ទៅជាសម្រាប់លិង្គវិញ តពីសេចក្តីផ្លាស់ប្តូរសាសនានេះមក ពុទ្ធរូប ឬរឿងការក្នុងពុទ្ធសាសនាទាំងឡាយនៅអង្គរធំ គេបានវាយចោលក៏មិនដឹង ហើយប្រាសាទបន្ទាប់បន្សំឯទៀត ដែលជាប្រាសាទសម្រាប់សាសនាព្រះឥសូរនោះ បានសាងបន្ថែមជាក្រោយនៅក្នុងទីបាយ័ន ខ្ញុំមិនមែនអួតថាសំអាងខ្ញុំនេះ អាចបំបាត់នូវសេចក្តីសង្ស័យ ហើយបំភ្លឺនូវសេចក្តីងងឹតគ្រប់ស្ថានបានឡើយ ដែលខ្ញុំនិយាយនេះ គឺថាក្នុងការដែលកំពុងតែរៀបរកសព្វ

ថ្ងៃនេះ សេចក្តីយល់ឃើញរបស់ខ្ញុំ ហាក់ដូចជាឃើញពិតជាងសេចក្តីឯទៀត ក្នុងការដែលបានដឹងស្គាល់ ក្នុងពួកសេចក្តីទាំងនេះ មានសេចក្តី ១ ឥតមានសន្ទិះសង្ស័យឡើយ គឺអំពីដែលព្រះពុទ្ធសាសនារុងរឿងថ្កុំថ្កើងណាស់ ក្នុងជាន់ដែលគេកប់អានក្បាច់អលង្ការក្នុងនគរខ្មែរ កាលជាន់ដើម គឺព្រោះតែជឿពុទ្ធសាសនានេះហើយ បានជាស្រុកខ្មែរកាលក្នុងឆ្នាំ ៩០០ មានសាងប្រាសាទដេរដាស ដូចកាលនគរបាកំងសែសក្នុងឆ្នាំ ១១០០ ដែរ មិនជាតាស់ទេដែលកប់បញ្ចូលប្រាសាទខ្លះក្នុងជាន់ដើមដែលធ្វើពីថ្មបាយក្រៀមផង ឯព្រះដែលសម្រាប់សាសនាក្នុងស្រុកខ្មែរក្នុងដើមឆ្នាំ ៩០០ នោះ មិនមែនជាហរិហរក្នុងជាន់ដំបូង ឬព្រះឥសូរក្នុងជាន់តមកឡើយ គឺជារូបលោកេស្វរដែលមានមុខច្បាស់ ហើយញញឹមមានមេត្តាទៅរកសេចក្តីឈឺចាប់និងទុក្ខភ័យរបស់មនុស្ស គឺថាជាតួអង្គពោធិសត្វ ដែលអ្នកកាន់ពុទ្ធសាសនាឲ្យនាមថាព្រះមហាករុណា ។ ជាក្រោយដែលសាសនាព្រាហ្មណ៍ មកលុកលុយសង្កត់សង្កិនកំណត់ ៣ ឆ្នាំនោះ ពុទ្ធសាសនាថ្កុំថ្កើងឡើងវិញ ក្នុងពជ្យជ័យវរ្ម័នទី ៦ ដែលមានកិរិយាប្រហែលគ្នានិងជ័យវរ្ម័នទី ១ ព្រោះជាអ្នកច្បាំងច្រើន ជាអ្នកសាងប្រាសាទច្រើន សាងទីព្យាបាលរោគច្រើនដូចគ្នា បើដូច្នេះឃើញថាសម័យដែលរុងរឿង ២ ដង ក្នុងពង្សាវតារខ្មែរនោះ គឺនៅក្នុងសម័យពុទ្ធសាសនាទាំងអស់ ហើយគេនិងបញ្ចប់សេចក្តីយល់ឃើញអំពីរឿងនេះបានថាសាសនាសព្វថ្ងៃនេះ ដែលអ្នកស្រុកស្រឡាញ់ណាស់ មិនមែន

ទើបនឹងនាំយកពីស្រុកក្រៅមកទេ ប៉ុន្តែដោយគ្មានសាលា និងសិក្សា សាសនានេះ ក៏កប់ឫសចុះទៅក្នុងគំនរយ៉ាងជ្រៅនៃរឿងរ៉ាវក្នុងនគរ ។

( ចប់តែប៉ុណ្ណេះ )

